# KhmerPost USA

សុបិន : (267) 253-3947, សែម : (781) 244-0522

VOL. 06 ISSUE 102 Mar. 9th - . 22nd, 2012


**មាតិការឿង** — **ទំព័រ**



# ក្រុមទីប្រឹក្សាសាលាក្រុងហ្វីឡាដែលហ្វៀ ខាងកិច្ចការអាស៊ី ចុះជួបពលរដ្ឋ

**ហ្វីឡាដែលហ្វៀ :** ប្រជាពលរដ្ឋមកពីអាស៊ីប្រមាណ ១០០នាក់ បានមកជួបប្រជុំនៅអង្គប្រជុំនៅ Southwask school កាលពីថ្ងៃទី៣ មិនា កន្លងទៅ ។ **ថាន ព្រំ** ដំណាងឱ្យ Migrant Education Program ជាអ្នកដឹកនាំរៀបចំឱ្យក្រុមភូមា ការ៉េន វៀតណាម ឥណ្ឌូណេស៊ី ណេប៉ាល់ បានជួបថ្នាក់ដឹកនាំសាលាក្រុងដោយមានការបកប្រែជាភាសាដើមជូនទៀតផង ។



ដឹកនាំកិច្ចប្រជុំដោយ ដេវិដ សេង នាយកប្រតិបត្តិនៅ Houston Center ចូលរួមដោយ រ៉ង ស៊ន នាយកប្រតិបត្តិសមាគមខ្មែរទាំងពីរនាក់ជាទីប្រឹក្សាសាលាក្រុងភាគីខ្មែរបានកត់ត្រានឹងទទួលយកនូវបញ្ហាប្រជាពលរដ្ឋមួយចំនួនទៅដាក់ជូនជាបណ្តឹងដល់សាលាក្រុងហ្វីឡាដែលហ្វៀឱ្យជួយដោះស្រាយ ។

មហាវិទ្យាល័យពេទ្យ Jefferson បានប្រកាសបើកការពិនិត្យរោគ ដោយមិនយកកំរៃនៅរៀងរាល់ថ្ងៃពុធទី១ នៃខែថ្មី ពីម៉ោង ៥:៣០ ដល់ ៨:០០ល្ងាច នៅ Houston Center 2029 S. 8th Street

ខាងក្រោមនេះជាយោបល់នៃក្រុមទីប្រឹក្សាសាលាក្រុងដែលបានមកចូលរួមប្រជុំ:

**David Seng លោក ដេវីដ សេង** ទីប្រឹក្សាលោកចៅហ្វាយក្រុងហ្វីឡាដែលហ្វៀថ្ងៃនេះយើងបើក កិច្ចប្រជុំដើម្បីជូនដំណឹងដល់អ្នកដែលទើបនឹងមកដល់ស.រ.អា ថ្មីៗ



**តទៅទំព័រទី ១១**

# បុណ្យផ្កាប្រាក់សាមគ្គី

យើងខ្ញុំព្រះករុណា ជាគណកម្មាធិការ(សមាគមគាំទ្រគ្រួសារខ្មែរ) នៅហ្វីឡាដែលហ្វៀទាំងអស់បាននាំគ្នាផ្តួចផ្តើមធ្វើបុណ្យផ្កាប្រាក់សាមគ្គីមួយ ដើម្បីប្រមូលបច្ច័យជួយឧបត្ថម្ភការផ្តើមដំណើរការណ៍ជួយដល់គ្រួសារខ្មែរក្នុងសហគមន៍ឱ្យអាចប្រឈមមុខនឹងស្ថានភាពសេដ្ឋកិច្ចគ្រួសារការណែនាំអប់រំកូនចៅ ឬសុខភាពផ្ទាល់ខ្លួនឱ្យបានមាំមួនប្រសើរឡើង ។

អាស្រ័យដូចជម្រាបជូនខាងលើនេះ យើងខ្ញុំព្រះករុណា សូមនិមន្តព្រះតេជគុណអញ្ជើញពុទ្ធបរិស័ទនិងញាតិញោមនៅគ្រប់មជ្ឈដ្ឋានមកចូលចាប់កុសល់ផលបុណ្យតាមកម្លាំងសទ្ធាជ្រះថ្លាកុំបីអាក់ខានឡើយ ។

**កម្មវិធីបុណ្យនៅវត្តព្រះពុទ្ធរង្សី** (ជ្រុងផ្លូវលេខ៦នឹងរីតនើ-ហ្វីឡាខាងត្បូង)
**ថ្ងៃ២កើត ខែចេត្រ ឆ្នាំ ថោះ ពស២៥៥៥ ត្រូវនឹងថ្ងៃសៅរ៍ ទី២៥ ខែមិនា ឆ្នាំ២០១២**
**ម៉ោង ៩ : ៣០ ព្រឹក** នមស្សការព្រះរតនត្រ័យ សមាទានសីល រាប់បាត្រ
**ម៉ោង ១១ ព្រឹក** ប្រគេនចង្ហាន់ព្រះសង្ឃ ព្រះសង្ឃអនុមោទនា
**ម៉ោង ១១ : ៣០ ព្រឹក** ទទួលភោជនាហារថ្ងៃត្រង់
មានការចែកផ្សាយព័ត៌មានស្តីពីការគាំទ្រគ្រួសារ ជាកិច្ចបញ្ចប់បុណ្យ ។

**អ្នកផ្តើមបុណ្យ :** លោក ស្រី សូស៊ីមន ចាប -លោក នឹងលោកស្រី ម៉ៅ ម៉ន-លោកស្រី សុបិន ពិន -លោកនឹងលោកស្រី ត្រែ ហ៊ល -លោកនឹងលោកស្រី ម៉ម យីន-លោកនឹងលោកស្រី ផល ឈឿន -លោកនឹងលោកស្រី ទូច វ៉ាន់ថន- លោកនឹងលោកស្រី ហ៊ូ តេង -លោកនឹងលោកស្រី គីម ភៀន ។

**ចង់បានព័ត៌មានបន្ថែមសូមទូរស័ព្ទ : សូស៊ីមន ចាប 215-455 7556**
**ឬ វ៉េរ សំខុន 215-913 0083**

# រំលឹកដល់ស្មារតីនៃថ្ងៃ១៨ មិនា ១៩៧០





បញ្ញវន្តខ្មែរត្រូវចូលសង្គមរាស្ត្រនិយមដើម្បីបានតំណែងជាមន្ត្រីធំ-តូច

**ដោយ : ពិន សំខុន**

▸ ជនកម្ពុជាជាច្រើនបានឃ្លាតចាកមាតុភូមិ ហើយមកដល់ទឹកដីសេរីនៃស.រ.អា កជាកូនពូនជាចៅបាន បានត្រឡប់មកពីការសិក្សាជាន់ខ្ពស់ឯបរទេសមកជួយដឹកនាំកម្ពុជា -មន្ត្រីរាជការទាំងស៊ីវិលទាំង យោធាទាំងប៉ូលិសសុទ្ធតែជ្រើសរើសតាមការប្រឡងប្រជែង



នរោត្តម ស៊ីហនុ



នរោត្តម ស៊ីហនុ ជួបម៉ៅសេទុង នៅប៉េកាំង

ច្រើនជំនាន់ ដោយសារតែស្មារតីនៃថ្ងៃ១៨ មិនា ឆ្នាំ១៩៧០នេះ ។ នៅ១សប្តាហ៍មុនថ្ងៃ១៨មិនា នៃឆ្នាំថ្មី យើងគួរទឹកដល់ស្មារតីដ៏អស្ចារ្យនោះដែលបានប្រមូលផ្តុំមនុស្សរាប់លាននាក់នាំគ្នាពង្រឹង?និងបញ្ឈរសង្គមខ្មែរ តាមគំរូនៃរបបថ្មីមួយក្នុងប្រទេសដែលចង់ឱ្យមានមនុស្សសេរី និងស្មើភាពគ្នា ។ នៅ៤២ឆ្នាំក្រោយចលនា១៨ មិនា នៅកម្ពុជា កាលពីឆ្នាំ១៩៧០ តើស្មារតីនោះមានព្រលឹងដល់ណាហើយ?

ឆ្នាំ១៩៧០នោះពាក្យស្លោកដ៏ធំជាងគេបង្អស់ គឺពាក្យ "សេរីភាព" ដែលប្រជាជាតិបានដណ្តើមយកពីសម្តេចសីហនុ ដែលបានក្តោបអំណាចគ្រប់វិស័យនៅកម្ពុជាក្នុងនាមជាព្រះមហាក្សត្រ តាំងតែពីឆ្នាំ១៩៤២ រហូតមកដល់ឆ្នាំ១៩៦៥នឹងក្នុងនាមជាព្រះប្រមុខរដ្ឋពីឆ្នាំ១៩៦៥ ដល់ឆ្នាំ១៩៧០ ។ នៅក្នុងអំណាចនោះ សម្តេចសីហនុបានបន្តនយោបាយដែលបារាំងនៅពេលចាកចេញពីកម្ពុជាបានបន្សល់នៅការបោះឆ្នោតសាកលតាមរូបមន្តនៃលទ្ធិប្រជាធិបតេយ្យផ្តើមនៅឆ្នាំ១៩៤៦ -ស្ត្រីនឹងបុរសមានសិទ្ធិស្មើគ្នា -បញ្ញាវន្តជាច្រើន យកសមត្ថភាពខ្ពស់ -អំណាចនៃប្រជាជាតិបានបែងចែកជានិតិប្រតិបត្តិ -និតិបញ្ញត្តិ និងតុលាការយ៉ាងដាច់ស្រឡះ ។ ស្ថាប័នដែលបន្សល់ទុកនោះនឹងធានានិរន្តភាពនៃ "សេរីភាព" របស់ពលរដ្ឋឱ្យប្រសើរ និងឱ្យមានយុត្តិធម៌ជាទីបំផុតដោយគ្មានបារាំងយួនយៀកមិញ ឬឥស្សរៈ នាឆ្នាំ១៩៥៤។

តែជាអកុសល គណបក្សដែលធ្លាប់តែមានប្រជាប្រិយ តាំងពីឆ្នាំ១៩៤៦ មក ពុំជាទីសព្វព្រះទ័យរបស់ព្រះមហាក្សត្រនរោត្តមសីហនុ ហើយរងនូវការគៀបសង្កត់កាន់តែច្រើនឡើង -គឺគណបក្សប្រជាធិបតេយ្យដែលសម្បូរដោយបញ្ញាវន្តចេញពីបច្ចឹមប្រទេស ហើយដែលតែងតែទាក់ទាញយកប្រជាប្រិយភាពភាគច្រើនដាច់ខាតក្នុងសភាជាតិពហុបក្ស ក៏រួញម្តងបន្តិច១មកដល់ក៏រិតសូន្យក្នុងសភាជាតិឯកបក្សសង្គមរាស្ត្រនិយមរបស់សម្តេចសីហនុ តាំងពីឆ្នាំ១៩៥៦ជារៀងរហូតមក ។ នេះជាដើមហេតុដំបូងបង្អស់នៃការបាត់បង់លំនឹងនយោបាយនៅកម្ពុជា ដោយសារភូមិសាស្ត្រនៃកម្ពុជាស្ថិតនៅមាត់ទ្វារនៃការប្រទាញប្រទង់មនោគមវិជ្ជា សេរីតទល់នឹងមនោគមវិជ្ជាកុម្មុយនិស្ត ថែមពីនេះទៅទៀតព្រះប្រមុខរដ្ឋ សីហនុ ទ្រង់មានជំនឿយ៉ាងមាំថាកុម្មុយនិស្តនឹងឈ្នះនៅក្នុងតំបន់អាស៊ីអាគ្នេយ៍នេះ ។ ជំនឿនោះបានគូសវាសនយោបាយដឹកនាំកម្ពុជាឱ្យបំរើនយោបាយបក្សកុម្មុយនិស្ត និងគំរូចិនដីគោកយ៉ាងខ្ជាប់ខ្ជួន នៅក្នុងតំបន់នៃអាស៊ីអាគ្នេយ៍នេះ ដែលជាបុព្វហេតុទីពីរដែលនឹងពង្រឹងជំហរឱ្យរឹងមាំក្នុងអំណាចដោយគ្មានគូរប្រជែងបាន ។ នាចន្លោះឆ្នាំ១៩៤៥ នឹងឆ្នាំ១៩៦០ មានការប្រកួតប្រជែងផ្ទៃក្នុងរវាងមនោគមវិជ្ជាកុម្មុយនិស្ត និងលោកសេរីនៅកម្ពុជា ពេលនោះគេឮឈ្មោះ ចៅសេង -ហ៊ូយន -ហ៊ូនិម -ខៀវ សំផន ដែលជាបញ្ញវន្តកុម្មុយនិស្តចេញមុខ រីឯ កេង វ៉ាន់សាក់ -ជូន ជឿន គេឮឈ្មោះជាអ្នកប្រឆាំងខាងនយោបាយឆ្វេងនិយម ចំណែកឯក្រុមលាក់មុខនៃក្នុងព្រៃម្ញូ នៅឯវៀតណាមខាងជើង មានអាចារ្យ មៀង ទូសាមុត -សាឡុតស ។ល។... បើមើលទៅខាងចលនាលោកសេរីនិយមវិញមានទ្រង់ យុត្តិវង្ស មាន អៀវ កើស មាន ស៊ឹមវ៉ា ឌុករ៉ាស៊ុ -សម សារី មានស៊ុំ ង៉ុកថាន់ ...ទាំងសងខាងបានបង្កើតការជម្លោះ ក្នុងស្រុកយ៉ាងខ្លាំងក្លាដែលអ្នកទាញយកផលចំណេញបាន គឺព្រះប្រមុខរដ្ឋនរោត្តមសីហនុដោយមិនឱ្យប្រជាប្រិយភាព នៃរដ្ឋាភិបាលណាមួយមានអាណត្តិលើសពី៦ខែបានឡើយ ក្រៅពីនិរន្តភាពរបស់ព្រះអង្គ ដោយមានអ្នកការពារផ្ទាល់ គឺកងទ័ព និងប៉ូលិសជាតិ រួមទាំងស្ថាប័នតុលាការសម្រាប់តែព្រះអង្គតែម្នាក់គត់... នេះជាបុព្វហេតុទីបីនៃការសងសឹកយ៉ាងពុះពោរនៃចលនាកុម្មុយនិស្ត និងចលនាសេរីនិយមខ្មែរ ពីព្រោះថា ទោះបីជាសម្តេចសីហនុមានទស្សនៈទោទន់ទៅរកកុម្មុយនិស្តក្តី ក៏ព្រះអង្គត្រូវការនូវអំណាចផ្តាច់មុខ តែមួយអង្គឯងគត់។



ទ្រង់ យុត្តិវង្ស



ទូសាមុត



ឌុករ៉ាស៊ុ

យកអំណាចពីរាស្ត្របានដោយបុព្វបុរសព្រះអង្គជារាជវង្សដែលបានសាងអង្គរវត្ត -ដោយសារកាំភ្លើងឈើដែលបានបណ្តេញអានាទិគមបារាំងចេញពីនគរ -ព្រះអង្គផ្តើមចិញ្ចឹមទំនាស់រវាងរាជវង្សខ្មែរនរោត្តមខ្មែរស៊ីសុវត្ថិ និងខ្មែរអង្គឌួង -ចិញ្ចឹមទំនាស់នយោបាយខៀវ ក្រហម -ចិញ្ចឹមកំហឹងនៃចលនារំដោះភ្នំដងរែក (សឹង ង៉ុកថាញ់) និងចលនារណសិរ្ស ភ្នំវាយចាប (ប៉ុល ពត) -ចិញ្ចឹមទំនាស់ចិន -យួន -រុស្ស៊ី ទល់នឹងអាមេរិកាំង -ចិញ្ចឹមវិបត្តិសង្គម ដោយអំពើពុករលួយ -ចិញ្ចឹមវិបត្តិបូរណភាព ដោយអនុញ្ញាតឱ្យយួនខាងជើងប្រើទឹកដីខ្មែរជាទីលានចម្បាំង... ឆ្នាំ១៩៧០ គឺជាចុងប៉ូចនៃវិបត្តិដែលបានរីកធំ ធ្វើឱ្យព្រះអង្គរែកឆ្វេងស្តាំ១លែងរួច។

សម្តេចសីហនុ លះបង់អម្រែក ចំពេលដែលស.រ. អាជិនណាយនឹងសង្គ្រាមវៀតណាម ដែលរាយបន្ទាយតាំងពីឆ្នាំ១៩៥០ -ចំពេលដែលវៀតណាម ចិន និងរុស្ស៊ី ត្រូវវាយផ្តាច់យកយួនខាងត្បូង -ចំពេលដែលចលនាស្តាំនិយម គឺលោក លន់ នល់ និងទ្រង់ស៊ីសុវត្ថិ សារីមត: -ចេង ហេង និងអ៊ិនតាំ កាន់អំណាច -ចំ ពេលដែលវៀតណាមមានទ័ពរបស់ខ្លួននៅពេញភាគខាងកើតនៃកម្ពុជា -ភ្លើងសង្គ្រាមក៏បានឆេះឆាបមកដល់កម្ពុជា ភ្លាមដោយមិនអាចបញ្ចៀសរួច។

សារីមត:

សម្តេចសីហនុ របូតចេញពីអំណាច "សាធារណរដ្ឋខ្មែរ" បានកើតឡើងដោយចៃដន្យ ដោយមេដឹកនាំនិយាយថា "ដោយខ្លាចសម្តេចសីហនុ ត្រឡប់មកវិញហើយសម្លាប់ចោលទាំងអស់គ្នា តែបញ្ញាវន្តខ្មែរ បានអបអរចំពោះព្រឹត្តិការណ៍ **តទៅទំព័រទី ៥**

តមកទំព័រទី ៤

# រំលឹកស្មារតីនៃថ្ងៃ១៨មិនា...

ដែលអវត្តមានសម្ដេចសីហនុ នឹងអាចបន្តចលនាសេរីរបស់មនុស្សទៅបាន ។ ភាពអបអរនោះហើយដែលបង្រួបបង្រួមពលរដ្ឋខ្មែរឱ្យយកឱកាសដ៏ល្អនេះ ដើម្បីរៀបចំនគរឱ្យបានបន្តពីស្មារតីដែលបារាំងបានបន្សល់ឱ្យខ្មែរនាពេលបានឯករាជ្យឆ្នាំ១៩៥៤ គឺការបោះឆ្នោតដោយសេរី គឺភាពស្មើគ្នារបស់មនុស្ស -គឺសង្គមមានយុត្តិធម៌ -គឺសង្គមដែលមានភាពស្អាតស្អំ -គឺប្រទេសដែលមានបូរណភាពពេញលេញ... ។ល ។ពាក្យទាំងនោះបានឮរំពងពេញនគរនាឱកាស២ឆ្នាំដំបូងដែលបញ្ញាវន្តខ្មែរចូលរួមសង្គ្រាមរំដោះនគរយ៉ាងគគ្រឹកគគ្រេងឆ្នាំ១៩ ហើយបង្កើតបានស្មារតីថ្មីមួយឈ្មោះ "ស្មារតី១៨មិនា" ដែលពលរដ្ឋអាយុពី១៨ដល់៥០ឆ្នាំទាមទារឱ្យពាក្យស្លោកទាំងឡាយក្លាយជាការពិតនៅកម្ពុជាបាតុកម្មនិងកូដកម្មធំៗមួយចំនួនបានកើតពេញទាំងនគរទាមទារឱ្យរដ្ឋាភិបាលយោធានិយមអនុវត្តនយោបាយថ្មីស្របតាមលទ្ធិប្រជាធិបតេយ្យសេរីនិយម -ហើយបែរជាទទួលការបង្ក្រាបជំនួសការយល់ស្របទៅវិញ ។ ពេលនោះ លោកសេនាប្រមុខប្រធានាធិបតីគ្រប់គ្រងនគរ លន់ នល់ ដោយបណ្ដេញវរៈជនសាធារណរដ្ឋចេញអស់រលីងមានទ្រង់ សិរិមតៈ -លោក ចេង ហេង លោក អ៊ិនតាំ លោកមេ ទ័ព សុស្ថែន ហ្វេណង់ដេស ។ ចលនានិស្សិត គឺជាចំណុចកណ្ដាលនៃការពង្រីង "ស្មារតី១៨មិនា" ឱ្យរីកដុះដាលពាសពេញកម្ពុជា តាមរយៈតំណាងរបស់សិក្សាធំតូចរាយនៅពាសពេញកម្ពុជា ហើយស្នាដៃដ៏ធំបំផុតមួយគឺការដង្ហែរក្បួនដោយមាន "ក្ដារម្ឈូសឥតខ្មោច"

ស្លុតដោយមាន"ក្ដាម្ឈូសឥតខ្មោច"នៅវិមានឯករាជ្យចំនួន៧យប់៧ថ្ងៃដោយក្រុមនិស្សិត៨មិនាចំនួនរាប់ម៉ឺននាក់គាំត្រដោយប្រជាពលរដ្ឋគ្រប់ស្រទាបវណ្ណៈជាសាក្សីនៃការវិវត្តន៍ចលនា ១៨ មិនាដើរផ្ទុយគ្នាពីសាធារណរដ្ឋខ្មែរ "ជាសញ្ញាថ្មីថា ស្មារតី១៨ មីនាបានផុសឡើងជាប្រាកដក្នុងដួងចិត្តនៃ មនុស្សជាច្រើនដែលបានមកសំដែងការខកចិត្ត របស់ខ្លួននាសប្ដាហ៍ដ៏អស្ចារ្យនោះ។

បន្ទាប់ពីព្រឹត្តិការណ៍"ក្ដាម្ឈូសឥតខ្មោច"ដែលជាសញ្ញានៃដំណើរដល់ទីបញ្ចប់នៃរដ្ឋាភិបាលស្មារតី១៨មីនា ក្រុមនិស្សិតបានបើកការចរចាជាមួយរដ្ឋាភិបាលលោកនាយករដ្ឋមន្ត្រី សឹង ង៉ុក


សឹង ង៉ុក ថាញ់

ថាញ់ នាចុងឆ្នាំ១៩៧២ ពេលនោះមានតំណាងនិស្សិត អ៊ុម យូហៃ (ប្រធាន) ខែម៉ាទូរី-អ៊ុន ហឿង-ឈឹងន់ និងតំណាងនិស្សិតប្រមាណ ២០រូបទៀត បានសម្រេចការងារដ៏សំខាន់មួយ គឺលោកនាយករដ្ឋមន្ត្រី សឹង ង៉ុកថាញ់ -លោករដ្ឋមន្ត្រី ថាច់ ជា នឹងលោក ភូ ស៊ីអ៊ុយ នាយកការិល័យសិក្សាឯបរទេស បានអនុញ្ញាត្តិឱ្យនិស្សិតឬសិស្សដែលមានសមត្ថភាពចាក់ចេញ ពីកម្ពុជាជាបន្តបន្ទាប់ ដោយមានអាហារូបករណ៍ ឬគ្មានទៅបន្តការសិក្សាឬជីវកាមដោយងាយស្រួល ។ ហេតុនេះហើយបានជាបញ្ញាវន្ត១៨ មីនារាប់ពាន់នាក់បានចាកចេញពីកម្ពុជាទៅរកប្រទេសសុវត្ថភាពបានច្រើន សូម្បីតែសិស្សវិទ្យាល័យ ក៏អាចចេញក្រៅប្រទេសបាន

ប្រមុខរដ្ឋ ចេង ហេង

ទ្រង់ សិរិមត

លន់ នល់

អ៊ិន តាំ

រដ្ឋាភិបាល ១៨មិនា ១៩៧០ នៃប្រទេសកម្ពុជា

ដែរ ដែលពីមុនៗមកមិនដែលមានសិស្សដល់ ១០០នាក់ទេ ដែលចេញទៅសិក្សានៅឯបរទេសក្នុង១ឆ្នាំៗ។

ឆ្នាំ១៩៧៥ អាមេរិកបានដកថយពីឥណ្ឌូចិន រដ្ឋាភិបាលខ្មែរដែលមានតែយោធាក៏ដួលរលំ ខ្មែរក្រហមក៏ចូលភ្នំពេញបាន ដោយចៃដន្យម្ដងទៀត ព្រោះមិនបានគ្រោងថា ចូលមកភ្នំពេញនាថ្ងៃ១៧មេសានោះទេ ដោយគ្មានកម្លាំងគ្រប់គ្រាន់ ។ ក្នុងបីឆ្នាំចុងក្រោយនេះសម្ដេចនរោត្តមសីហនុនៅក្នុងដៃបីបមថ្នាក់ថ្មរបស់ចិនក្រហមបានបំរើនយោបាយក្រុមខ្មែរក្រហម ប៉ុល ពត -ខៀវ សំផន យ៉ាងយកចិត្តទុកដាក់រហូតបានផ្ដល់ជ័យជំនះដល់ក្រុមខ្មែរក្រហមគំរូចិនប៉េកាំង ។ តែចលនា១៨មីនា មិនបានអបអរនឹងជ័យជំនះរបស់ក្រុមវណ្ណៈអធននៅភ្នំពេញនោះទេ នៅទីក្រុងប៉ារីសមានការជួបជុំគ្នា រវាងក្រុមសាធារណរដ្ឋនឹងក្រុម១៨មីនា ប្រឆាំងនឹងពួកកុម្មុយ-និស្តយ៉ាងដាច់អហង្កា ។

គេអាចសង្កេតឃើញក្នុងក្រុមព្រឹទ្ធាចារ្យមាន លោក ស៊ុម វ៉ា -សុខ ឆុង-សឹង សាន នឹងក្រុមយុវបញ្ញាវន្តមាន លិម គិមយ៉ា មានលោកហាក់ព្រួ -លោក ឌុក រ៉ាស៊ី -តាន់ ប៊ុនសួរ ។ល ។ ដែលបានចេញមុខដឹកនាំចលនាប្រឆាំងនឹងរបបកុម្មុយនិស្តដឹកនាំដោយលោក សឹង សាន ។ កម្លាំងនៃការគាំទ្រនោះបានផ្ដល់ឱ្យចលនាខ្មែររំដោះជាតិលោក សឹង សាន នូវការគាំទ្រពីប្រទេសសហគមន៍អាស៊ាននូវការគាំទ្រពីសហគមន៍ខ្មែរនៅសហ-រដ្ឋអាមេរិកនៅអឺរ៉ុបនឹងអូស្ត្រាលីយ៉ាងកក់ក្ដៅ ថាជាចលនាប្រឆាំងនឹងកុម្មុយនិស្តពីឆ្នាំ ១៩៧៦ រហូតមកដល់ឆ្នាំ១៩៨២ ។ នៅឆ្នាំ១៩៨២ ចលនាលោក សឹង សាន បានប្រែទៅជាចលនា "មិនមែនកុម្មុយនិស្ត"ហើយនៅឆ្នាំ១៩៨២នោះ លោក សឹង សាន រួមដំណើរដោយ ខៀវ សំផន នឹងសម្ដេចសីហនុ បានធ្វើទស្សនកិច្ចផ្លូវការនៅប៉េកាំង ហើយទទួលជំនួយយោធាពីចិនកុម្មុយនិស្តចាប់ពីពេលនោះទៅ ដើម្បីចូលរួមក្នុងរណសិរ្សរួបរួមជាតិកម្ពុជា ។ គឺចាប់ពីពេលនោះឯង ហើយដែលក្រុមព្រឹទ្ធាចារ្យប្រឆាំងកុម្មុយនិស្តក្រុម១៨មីនា នឹងក្រុមសាធារណរដ្ឋបានរំលាយខ្លួនបោះបង់ការគាំទ្រដល់ក្រុមលោក សឹង សាន ដែលពួកគេយល់ថា"លោក សឹង សាន បានក្បត់ គំនិតដើម ហើយទៅចូលដៃនឹងកុម្មុយនិស្ត" ។

ការរំលាយខ្លួន ដោយមានភាពរំលោភលើការទុកចិត្តផ្ទៃក្នុងបានធ្វើឱ្យក្រុមអ្នកប្រឆាំងនឹងទស្សនះកុម្មុយនិស្តទាំងអស់ស្រងល់ ហើយបាត់ខ្លួនមួយរយៈធំតែនៅតែខិតខំតាមដានពីគ្នាឬជាឯកជន នូវដំណើរស្វែងរកសន្តិភាពកម្ពុជារបស់សហគមន៍អន្តរជាតិយ៉ាងជិតស្និទ្ធនាឆ្នាំបន្តបន្ទាប់ដោយមិនសូវខ្វល់ខ្វាយពីសកម្មភាពចម្បាំងច្រើនជាងសកម្មភាពមនុស្សធម៌ទេ ។ ៤០ឆ្នាំកន្លងទៅអ្នករក្សាស្មារតី១៨មីនាបានស្លាប់ដោយមីនាជាបន្តរគ្នា រីឯយុវជនជំនាន់មុនបានក្លាយទៅជាបញ្ញវន្តជំនាន់ក្រោយបានទាក់ទងនៃស្មារតី១៨មីនាយ៉ាងខ្ជាប់ខ្ជួននឹងរ៉ឹងប៉ឹង ។ គេឃើញមានចលនា"មូលខ្មែរ"ក្រោយមកចលនា"ព្រំដែនការពារបូរណភាពទឹកដីខ្មែរ "ចលនា"ការពារសិទ្ធិមនុស្ស "ចលនា"ខ្មែរម្ចាស់ស្រុក"ចលនាបូរីជងសម្រាប់កម្ពុជាកើតឡើងព្រោងព្រាត ហើយភាពបរិសុទ្ធរឹងម៉ឹងនឹងព្យាយាមធ្វើឱ្យខ្ញុំនៅតែយល់ថា ស្មារតី១៨មីនា ១៩៧០ នៅតែរស់រានមានជីវិតជាពិសេសនៅមានមនុស្សជាច្រើនដែលជាធ្លាប់រស់នៅនាសម័យសាធារណរដ្ឋនៅតែអរគុណដ៏សម័យដែលអំណាចសម្ដេចសីហនុបានត្រូវប្រជារាស្ត្រដកហូតចេញបានទោះជាក្នុងតម្លៃខ្ពស់ក៏ ដោយ ...ក៏ប៉ុន្តែប្រវត្តសាស្ត្រខ្មែរដែលគេមិនព្រមរៀនសូត្រនៅតែត្រឡប់មកបាននៅឡើយ ៕

យុវជន-យុវនារីនៃចលនា ១៨មិនា មាន ព្រះសង្ឃ និស្សិត និងសិស្ស ទូទាំងប្រទេស






ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៧ ខែកុម្ភៈ ឆ្នាំ២០១២

# មានការអះអាងថា អភិបាលក្រុងបាវិតជាជនសង្ស័យក្នុងការបាញ់ប្រហារកម្មករ

ឃួន ណារិម និង DENE-HERN CHEN
ខាបូឌាដេលី

លោក ស ខេង រដ្ឋមន្ត្រីក្រសួងមហាផ្ទៃបានបញ្ជាក់កាលពីម្សិលមិញថា លោក ឈូក បណ្ឌិត អភិបាលក្រុងបាវិត គឺជាជនសង្ស័យក្នុងការបាញ់ប្រហារទៅលើក្រុមបាតុករកាលពីសប្តាហ៍មុន នៅឯតំបន់សេដ្ឋកិច្ចពិសេសមួយ (SEZ) ក្នុងខេត្តស្វាយរៀង ។

ការលើកឡើងនេះបានកើតឡើងនៅពេលជនរងគ្រោះម្នាក់ក្នុងចំណោមជនរងគ្រោះដោយសារការវាយប្រហារបាននិយាយថា មន្ត្រីក្រុងបាវិត៥នាក់កាលពីថ្ងៃពុធ អមដោយមនុស្ស២នាក់ទៀត បានមកដល់មន្ទីរពេទ្យនៅរាជធានីភ្នំពេញដែលស្ត្រីរងគ្រោះនេះកំពុងតែសម្រាកព្យាបាល ដើម្បីឧបត្ថម្ភប្រាក់ដល់នាងចំនួន៥០០ដុល្លារ និងឱ្យនាងផ្តិតមេដៃនៅលើឯកសារមួយដោយឱ្យនាងសន្យាថា និងមិនប្តឹងខ្មាន់កាំភ្លើងឡើយ ។

លោក ស ខេង បានមានប្រសាសន៍នៅក្រៅសិក្ខាសាលាស្តីអំពីការការពារកុមារក្នុងក្រុងភ្នំពេញ កាលពីម្សិលមិញថា ក្រសួងមហាផ្ទៃបានស្គាល់អត្តសញ្ញាណអ្នកបាញ់ប្រហារហើយ ប៉ុន្តែត្រូវការពេលវេលាថែមទៀត ដើម្បីធ្វើការស៊ើបអង្កេត "តាមវិធីសាស្ត្រច្បាស់លាស់" ។ នៅពេលត្រូវបានសួរថា តើលោកបណ្ឌិត គឺជាជនសង្ស័យ ឬយ៉ាងណានោះ លោក ស ខេង បានមានប្រសាសន៍ថា "ហ្នឹងហើយ"គាត់ជាជនសង្ស័យជាការសង្ស័យ ។ យើងមិនអាចចោទគាត់បានទេ " ។

លោក ស ខេង បានបន្ថែមថា "ចាប់ខ្លួនជនសង្ស័យមិនមែនក្រសួងមហាផ្ទៃជាអ្នកធ្វើនោះទេ ។ តុលាការជាអ្នកមានសិទ្ធិ " ។ ស្ត្រី៣នាក់បានរងរបួសកាលពីថ្ងៃទី២០ ខែកុម្ភៈ នៅពេលបុរសស្លៀកពាក់ឯកសណ្ឋានម្នាក់ បានបាញ់ប្រហារទៅលើការតវ៉ាដ៏ហិង្សាមួយ របស់កម្មកររោងចក្រនៅឯតំបន់សេដ្ឋកិច្ចពិសេសម៉ាន់ហាតតាន់នៅក្រុងបាវិត ។ នៅថ្ងៃបន្ទាប់លោក ស ខេង បានមានប្រសាសន៍ថា អាជ្ញាធរបានកំណត់មុខសញ្ញាអ្នកបាញ់ ប៉ុន្តែអាជ្ញាធរតាំងពីនោះមកនៅតែបិតមុខ មិនព្រមបង្ហាញអត្ត - សញ្ញាណជនសង្ស័យឡើយដោយនិយាយថា ការស៊ើបអង្កេតកំពុងតែដំណើរការ ។ លោក ហ៊ីង ប៊ុន ជា ព្រះរាជអាជ្ញារងអមសាលាដំបូងខេត្តស្វាយរៀង បានមានប្រសាសន៍ថា លោកបានទទួលសំណុំរឿងដែលមានបញ្ចូលលទ្ធផលនៃការស៊ើបអង្កេតរបស់ក្រសួងមហាផ្ទៃកាលពីយប់ថ្ងៃច័ន្ទ ហើយលោកកំពុងតែពិនិត្យមើល ។ លោកបានបដិសេធមិនបញ្ជាក់ថា តើជនសង្ស័យដែលមានឈ្មោះក្នុងសំណុំរឿងនោះ គឺជាលោកបណ្ឌិតឬយ៉ាងណានោះទេ ប៉ុន្តែលោកបានថ្លែងថា លោកអភិបាលក្រុងបាវិតបានចូលខ្លួនឱ្យសាកសួរនៅសប្តាហ៍នេះ លោក ប៊ុន ជា បានថ្លែងថា "លោកបណ្ឌិតបានចូលខ្លួនមកឆ្លើយបំភ្លឺនៅឯតុលាការ ហើយគាត់ថ្លែងថា"ការបាញ់នោះមិនមែនជាចេតនាទេ" ។ លោកបានបដិសេធមិនធ្វើអត្ថាធិប្បាយបន្ថែមទៀតឡើយ ។

លោកបណ្ឌិតបានថ្លែងថា លោកបានចូលរួមប្រជុំកាលពីម្សិលមិញ ហើយលោកដាក់ទូរស័ព្ទចុះឈប់និយាយជាមួយអ្នកយកព័ត៌មាននៅពេលទាក់ទងដើម្បីធ្វើការអត្ថាធិប្បាយ ។

កាលពីថ្ងៃពុធមន្ត្រីរាជរដ្ឋាភិបាល៥នាក់ មកពីក្រុងបាវិតបានទៅសួរសុខទុក្ខឈ្មោះ ប៊ុន ចិន្តា អាយុ២១ ដែលរងរបួសធ្ងន់ដោយសារការបាញ់ប្រហារនៅមន្ទីរពេទ្យជាទីកន្លែងដែលនាងកំពុងទទួលការព្យាបាលបន្ទាប់ ពីគ្រាប់កាំភ្លើង១គ្រាប់បានទម្លុះខ្នងធ្លាយដល់សួតនាង។

បងប្រុសរបស់នាង ចិន្តា ឈ្មោះ សំ ស៊ីណាត អាយុ២៣ឆ្នាំ បានប្រសាសន៍នៅឯមន្ទីរពេទ្យថា មន្ត្រីម្នាក់ក្នុងចំណោមមន្ត្រីក្រុងបាវិតបានប្រាប់ថា ជាតំណាងរបស់លោកស្រី ម៉ែន សំអន ឧបនាយករដ្ឋមន្ត្រី និងជាសមាជិកសភាប្រចាំខេត្តស្វាយរៀង ។

ស្ត្រីរូបនេះដែលមិនប្រាប់ឈ្មោះបានអះអាងថា លោកស្រី ម៉ែន សំអន ឧបនាយករដ្ឋមន្ត្រីបានផ្តល់ជំនួយជាប្រាក់២លានរៀល ប្រហែល៥០០ដុល្លារដល់គ្រួសារនាងចិន្តា ។ បុរសនិងស្ត្រីម្នាក់ទៀតដែលមិនប្រាប់ឈ្មោះ ប៉ុន្តែអមដំណើរមន្ត្រីក្រុងបាវិត៥នាក់នេះ បានសុំឱ្យ នាងចិន្តាផ្តិតមេដៃលើឯកសារមួយ ។ ជនទាំងពីរនាក់នេះ ក៏បានសុំឱ្យនាងចិន្តាកុំប្តឹងជនសង្ស័យដែរ តែមិនបរិយាល្អិតល្អន់អំពីថា នរណាជាជនសង្ស័យនោះទេ ។

លោក ស៊ីណាត បាននិយាយថា "ពួកគេបានសុំឱ្យពួកយើងផ្តិតមេដៃលើក្រដាសមួយសន្លឹក ហើយបានសុំឱ្យពួកយើងកុំប្តឹងជនសង្ស័យ" ។

លោកបាននិយាយថា"គ្រួសាររបស់ខ្ញុំមិនចង់ផ្តិតមេដៃលើឯកសារនោះទេ ប៉ុន្តែយើងខ្លាចអ្នកមានអំណាច" ។ លោកបានបន្ថែមថា ពួកគេផ្តិតមេដៃលើឯកសារ ប៉ុន្តែមិនថា ឯកសារនោះមានន័យយ៉ាងម៉េចទេ ។ "ខ្ញុំខ្លាចពីព្រោះខ្ញុំបារម្ភថា ខ្លាចមានបញ្ហាកើតឡើងនៅថ្ងៃមុខ" ។

ជនរងគ្រោះម្នាក់ឈ្មោះ នុត សាខន អាយុ២៣ឆ្នាំដែលកំពុងទទួលការព្យាបាលនៅឯគ្លីនិកឯកជនមួយក្នុងក្រុងស្វាយរៀងបាននិយាយថា តំណាងរបស់លោកស្រី ម៉ែន សំអន បានមកសួរសុខទុក្ខនាងកាលពីថ្ងៃអង្គារ៍ ដោយឱ្យប្រាក់នាង៥០០ដុល្លារ ។

នៅពេលសួរថា តើមន្ត្រីទាំងនោះបានសុំឱ្យនាងផ្តិតមេដៃលើក្រដាសមួយសន្លឹក ឬសុំឱ្យកុំឱ្យនាងប្តឹងនោះ នាងសាខនបានមានការស្ទាក់ស្ទើរមុនពេលឆ្លើយថា "ខ្ញុំបានទទួលប្រាក់២លានរៀលកាលពីថ្ងៃអង្គារ៍ពីលោកស្រី ម៉ែន សំអន ។ ខ្ញុំមិនចង់ប្តឹងទេពីព្រោះខ្ញុំមិនចង់មានបញ្ហាទៀតទេ " ។

យោងតាមលេខាធិការម្នាក់របស់លោកស្រីឧបនាយករដ្ឋមន្ត្រី ម៉ែន សំអន បានឱ្យដឹងថា ជនរងគ្រោះទាំងបីឈ្មោះ កែវ នី ក៏បានទទួលប្រាក់២លានរៀលពីលោកស្រី ម៉ែន សំអន ដែរ ។

ដោយទាក់ទងបានកាលពីម្សិលមិញលោកស្រី ម៉ែន សំអន បានបញ្ជាក់ថា តំណាងរបស់លោកស្រីបានផ្តល់ប្រាក់ឱ្យជនរងគ្រោះបីនាក់ ដោយសារការបាញ់ប្រហារនេះ ។

នៅពេលសួរអំពីទំនាក់ទំនងជាមួយលោកបណ្ឌិត លោកស្រី ម៉ែន សំអន ថ្លែងថា "យើងមានទំនាក់ទំនងជាមួយអភិបាលស្រុកទាំងអស់៨រូបនៅក្នុងខេត្តស្វាយរៀង មិនមែនតែលោកបណ្ឌិតប៉ុណ្ណោះទេ ពីព្រោះយើងចង់ទទួលរបាយការណ៍ពីការអភិវឌ្ឍន៍" ។

លោកស្រីឧបនាយករដ្ឋមន្ត្រីបានបន្ថែមថា"ប្រសិនបើលោកបណ្ឌិតធ្វើអ្វីខុសវា គឺជាកំហុសរបស់គាត់" ។ លោកស្រីបានបដិសេធមិនធ្វើអត្ថាធិប្បាយថែមទៀតឡើយ ។

លោក មឿន តុលា ប្រធានកម្មវិធីផ្នែកការងារនៅមជ្ឈ-មណ្ឌលអប់រំផ្នែកច្បាប់សម្រាប់សហគមន៍បានមានប្រសាសន៍ថា ការសន្យាមិនប្តឹងរបស់ជនរងគ្រោះពីបទឧក្រិដ្ឋណាមួយមិនគួរពិចារណាថា ត្រឹមត្រូវតាមច្បាប់នោះទេ ។

លោកបានមានប្រសាសន៍ថា "ហេតុអ្វីបានជាពួកគេយកប្រាក់មកឱ្យ ហើយក្រោយមកសុំឱ្យក្រុមគ្រួសារផ្តិតមេដៃលើក្រដាសមួយសន្លឹក ដោយប្រាប់កុំឱ្យប្តឹងជនសង្ស័យ?។ ក្រុមគ្រួសារនេះមិនយល់ស្របទាំងស្រុងថា ពួកគេនឹងមិនប្តឹងជនសង្ស័យនោះទេ ពីព្រោះពួកគេមិនយល់អត្ថបទនៅលើក្រដាសឡើយ ដូច្នេះវាមិនមែនជាការព្រមព្រៀងពិតប្រាកដនោះទេ" ។

អង្គការសិទ្ធិមនុស្សផ្សេងទៀតបានបន្តអំពាវនាវដល់រដ្ឋាភិបាលឱ្យចាប់ខ្លួនជនសង្ស័យឱ្យកាន់តែឆាប់កាន់តែប្រសើរ ។

លោក អំ សំអាត ប្រធានផ្នែកបច្ចេកទេសរបស់អង្គការសិទ្ធិមនុស្សលីកាដូ បាបមានប្រសាសន៍ថា ប្រសិនបើជនសង្ស័យជាអភិបាលក្រុងគួរតែចាប់ខ្លួនគាត់ភ្លាម ។

លោក សំ អាត បានមានប្រសាសន៍ថា"វាជាអំពើឃាត-កម្មគិតទុកជាមុន ពីព្រោះជននេះបានចូលទៅរោងចក្រ ហើយបាញ់ប្រហារមនុស្សបីនាក់ ដោយធ្វើឱ្យពួកគេរងរបួស ។ ប្រសិនបើតុលាការមិនចេញដីការចាប់ខ្លួនទេ ប្រជាជននឹងអស់ជំនឿទៅលើប្រព័ន្ធតុលាការ" ៕ *ប្រែសម្រួលដោយ ចៅ ប៊ុនទី*

# Bavet Governor Named as a Suspect in Factory Shooting

**By Khuon Narin And Dene-Hern Chen**

THE CAMBODIA DAILY

Bavet city governor Chhuk Bundith is a suspect in last week´s triple shooting of protesters at a special economic zone (SEZ) in Svay Rieng province, Interior Minister Sar Kheng confirmed yesterday.

The revelation came as one of the victims of the shooting said that five Bavet city officials visited her hospital bedside in Phnom Penh on Wednesday to give her $500, accompanies by two other people who made her thumbprint a document and asked that she not pursue legal action against the person who shot her.

Speaking on the sidelines of a child protection workshop in Phnom Penh yesterday, Mr. Kheng said that the Interior Ministry has known the identity of the shooter for more than a week but needed time to carry out an investigation "with clear methods."

When asked if Mr. Bundith was the suspect, Mr. Kheng said, "Of course he is a suspect, but it´s just a suspicion, so we can not accuse him." He added: " To arrest the suspect, it is not for the Interior Ministry to do. It is for the court to authorize."

Three women were wounded on Feb. 20 when a uniformed man opened fire at a violent factory protest at Bavet city´s Manhattan SEZ. The next day, Mr. Kheng said that authorities had identified the attacker, but authorities have since remained tight-lipped on the suspect´s identify, saying that an investigation was in progress.

Hing Bunchea, Svay Rieng provincial deputy prosecutor, said he recieved the case file containing the Interior Ministry´s investigation results on Monday night and was still reviewing it. He declined to confirm if the suspect named in the file was Mr. Bundith but said the Bavet city governor had come in for questioning this week.

"[Mr. Bundith] came to answer questions at the court, and he said that it [the triple shooting] was not intentional," said Mr. Bunchea, who refused to comment further.

Mr. Bundith said he was in a meeting yesterday and hung up on a reporter when contacted for comment.

Five government officials from Bavet city to Bun Chenda, 21 the most seriously injured in the shooting on Wednesday at her ward in Calmette Hospital, where she is being treated after a bullet entered her back and pierced her lung.

Ms. Chenda´s brother, Sam Sinat, 23, said at the hospital that one of the Bavet municipal officials identified herself as a representative of Deputy Prime Minister Men SamAn, who is also a member of Parliament for Svay Rieng.

The woman announced that Ms. SamAn was donating 2 million riel, or about $500, to Ms. Chenda´s family. Another man and woman who did not introduce themselves but accompanied the five Bavet officials told Ms. Chenda and her relatives to thumbprint a document. The two appealed to Ms. Chenda not to file a complaint against the suspect, without elaborating on who the suspect was.

"They asked us to thumbprint a piece of paper and asked us not to sue whoever the suspect is," Mr. Sinat said.

"My family didn´t want to thumbprint the paper, but we were afraid of the power [these people have]," he said, adding that they thumbprinted the document but did not know what it said. "I am scared because I am worried that a problem will happen in the future."

Another victim, Nuth Sokhorn, 23, who is being treated at a private clinic in Svay Rieng city, said that representatives of Ms. SamAn visited her Tuesday to give her $500.

When asked if officials had asked her to thumbprint a piece of paper or asked her not to file a complaint, Ms. Sokhorn hesitated before answering: "I recieved 2 million riel Tuesday from Men SamAn. I don´t want to file a complaint because I don´t want to have problem anymore."

The third victim, Keo Ny, also recieved $500 from Men SamAn, according to a secretary to the deputy prime minister.

Contacted yesderday, Ms. Men SamAn confirmed that her representatives had given the money to the three victims of the shooting.

When asked about her relationship with Mr. Bundith, Ms. SamAn said, "We were in communication with all eight district governors in Svay Rieng province, not just Bundith."

"If [Mr. Bundith] did something wrong, it is his fault," the deputy prime minister added, declining to comment further.

Moeun Tola, head of the labor program at the Community Legal Education Center, said promises to not pursue legal action extracted from victims in their hospital beds should not be considered legally valid.

"Why do they bring money and then ask the family to thumbprint a piece of paper and tell them not to sue the suspect? The family did not fully agree that they will not sue the suspect because they did not understand the meaning on the paper and did not know the terms. Hence, it is not a real agreement," he said.

Other human rights groups continued to appeal to the government to arrest the suspect, whoever he may be, as quicky as possible.

Am SamAth, technical supervisor at rights group Licadho, said that if the suspect was the city governor, he should have been immediately arrested. "It is attempted murder because he went inside the factory and shot three people, injuring them," he said. "If the court does not issue an arrest warrant, the people will lose confidence in the court system."

Independent political analyst Lao Mong Hay said authorities´ reluctance to discuss the case could be a sign that Mr. Bundith was well connected. Mr. Mong Hay quoted a Khmer proverb often cited by Prime Minister Hun Sen: "If you beat the dog, you have to mind its owner."

If authorities arrest Mr. Bundith, they must also exmaine the suspect´s connections to higher-ranking officials, Mr. Mong Hay explained. He said this dilemma could explain why the Interior Ministry has formed a taskforce to investigate the case rather than leaving it to local police.

"[The taskforce] would also allow authorities to share the responsibility of the arrests, in case of any intervention from the more powerful people," Mr. Mong Hay said. "We don´t have any rule of law yet. We only have the rule of man."

ទំព័រកំសាន្ត
គឹម ភឿន






នៅភូមិអូរអណ្ដូងសង្កាត់ព្រែកប្រាខាងត្បូងច្បារអំពៅ ប្រពន្ធ អាប្រុញល្បីឈ្មោះខាងប្រច័ន្ឌប្ដីលេខមួយ ។ មិនដឹងពីមុនពីរនាក់ប្ដីប្រពន្ធនេះនៅឯណាទេ ស្រាប់តែព្រឹកមួយមានរថយន្តត្រាក់មួយធំដញ្ជូនរបស់របរណែនសឹងតែប្រេះឡានមានទូ.គ្រែ.តុ.ឆ្នាំង.ចាន ។ល ។ ចូលមកនៅផ្ទះលេខ១២៥គនៅតាមផ្លូវទៅកោះក្របី ។ ប្ដីមានរាងតូចស្ដើងមិនសូវចេះនិយាយច្រើនទេតែឧស្សាហ៍ធ្វើការរកស៊ីដើម្បីចិញ្ចឹមប្រពន្ធ១កូនប្រុស១ អាយុមួយឆ្នាំ៤ខែ នឹងកូនមួយទៀតនៅក្នុងផ្ទៃអាយុ៤ខែប្លាយ ។ ចំណែកឯនាងប្រពន្ធវិញរាង "ម៉ាប់" មាត់ និយាយមិនចេះនឿយហត់ដល់បន្ទិចបន្ដួចឡើយ ។ ការងាររបស់នាងគឺចិញ្ចឹមកូននៅផ្ទះហើយរង់ចាំប្ដីមកផ្ទះវិញពីការងារដើម្បីចោទប្រកាន់ពីរឿងសង្ស័យផ្សេងៗ ហើយចាប់កំហុសឱ្យបានជារឿងឡើង ។ ទើបតែមកនៅមិនទាន់បាន២អាទិត្យផងរឿងឈ្លោះប្រកែកពីរឿងប្រច័ន្ឌនេះផ្ទុះឡើងជាង១០ដងទៅហើយ ។

ព្រឹកនេះមុននឹងចេញទៅធ្វើការឱ្យគេប្រពន្ធហៅមកសួរចម្លើយសិនៈ "មើល៍បងប្រុញខ្ញុំសួរសិន ចុះថាគេអស់ស្រូវទំហើញនៅឯវាលស្រែឃុំឈើទាលស្រុកគៀនស្វាយក្នុងអាទិត្យនេះ ចុះបងទៅណាធ្វើអីព្រឹកនេះ?"

-បងទើបរកបានការងារធ្វើនៅផ្ទះគេព្រឹកនេះ ។

-នៅឯណា? ។

-អញ្ចឹងក៏ចាំសួរដែរយ៉ាប់មែន ក្រែងអត់មានការធ្វើយើងអត់បាយទាំងអស់គ្នាអ្ហា? ។ ប្រពន្ធកាន់តែសង្ស័យខ្លាំងព្រោះមិនហ៊ានប្រាប់កន្លែងធ្វើការ ។ នាងប្រពន្ធដាក់កូនចុះហើយឈានចូលចាប់កអាវប្ដីជាប់ក៏ស្រែកកំហាកដោយកំហឹង "ឃើញទេ មានហ៊ានប្រាប់ការពីតអី! បងប្រុញ! ប្រុសៗតែយ៉ាងណឹងយកគេមានកូនចង់គេចទៅរកថ្មីទៀត ។ ឃើញគេខូចអស់រាងអស់រៅចង់ក្រវាត់គេចោលអ្ហា? កុំច្រឡំណាំបងប្រុញ ! បងប្រុញឯងស្គាល់មីកាព្រឹមនេះតិចពេកហើយបង ។ ស្រាប់តែនាងសង្កេតឃើសក់មួយទងជាប់នឹងកអាវប្ដីនាងទាញមកបង្ហាញប្ដី : "នេះសក់មីណាជាប់នៅលើអាវបងឯង ? បងឯងដេកចូល មីណាមានសក់ខ្លីយ៉ាងណឹងអ្ហា? ។ សក់បងតើសក់ពីណា! បងទើបកាត់ពីម្សិលជាងគាត់គ្របខ្លួនបងមិនជិត ទើបមានសក់ខ្លះជ្រុះមកជាប់នឹងអាវខោបង ។ នាងយល់ព្រមៈ "អើៗសក់បងមែន... តែនេះនែសក់ពីណារួញៗជាប់លើស្មាបង? ។ នាយប្ដីកាន់យកសក់មួយសរសៃនោះមកពិនិត្យៈ "សក់រួញៗមែន! តែនោះជាសក់របស់អូនតើ! នេះអូនប្រៀបធៀបសក់នេះនឹងសក់នៅគុម្ពត្រចៀកអូនមើលមើល៍ដូចគ្នាទេ? ។ នាងប្រពន្ធសម្លឹងមួយសន្ទុះក៏ងក់ក្បាលហើយយល់ព្រមៈ " អើៗសុំទោសណាំបងប្រុញសក់អូនមែន! " ។ ថាហើយនាងខំស្វែងរកមើលថែមទៀត ក្រែលោរកបានភស្តុតាងយកមកដេញដោលរករឿងទៀត ។ រកមិនឃើញទៀតសោះនាងប្រពន្ធក៏ស្រែកយំងោ៉ងឡើងៈ "បងប្រុញអើយបងប្រុញ ! បងយកមីណាច្បាស់ជាក្បាលទំពែកហើយទើបគ្មានឃើញជ្រុះសក់មួយទងសោះយ៉ាងនេះ! ។ ងាប់ហើយបងប្រុញអើយ!យកវាបើបានកូនប្រុសមិនសូវអីទេ ឱ្យវាទៅបួសទៅរហូតដល់ចាស់ គេសរសើរថាបានខំបួសរៀនរហូតដល់ទំពែកក្បាលអស់ វាល្អកេរ្តិ៍ឈ្មោះដែរ. តែបើគ្នាជាស្រីវិញមានអាណាទៅដណ្ដឹងគ្នាធ្វើជាព្រន្ធទៀត ? ក្បាលគ្មានសក់មួយទងយ៉ាងនេះ!វាច្បាស់ជាត្រូវយកប្ដីគេប្ដីឯងទៀហើញបងប្រុញ! ដូចតែម៉ែវាមកយកប្ដីខ្ញុំអញ្ចឹង បងគ្មានចេះអាណិតកូនដល់តិចសោះឡើយបងប្រុញ ! ។

នាយប្រុញទ្រាំលែងបានក៏កន្ត្រាក់កង់កញ្ចាស់របស់ខ្លួនទាំងរអ៊ូថាៈ "នៅយូរៗតិចទ្រាំមិនបាននែ ! បងទៅធ្វើការហើយ ធ្វើថ្ងៃដំបូងផងកុំឱ្យយឺតយ៉ាវប្រយ័ត្នគេឈប់ឱ្យធ្វើទៀតអត់បាយទាំងអស់គ្នាមិនខាន "និយាយរួចហើយក៏ឡើងជិះកង់តម្រង់ទៅវត្តចំពុះក្អែក ភូមិកោះក្របីបាត់ទៅទុកឱ្យនាងកាព្រឹមស្រែកយំរៀបរាប់ម្នាក់ឯង ។

ស្រាប់តែពូប្រើយអ្នករត់កង់ឌុបជិះកាត់ទទឹង នាងកាព្រឹមស្រែកហៅៈ "ពូប្រើយកង់ឌុប!ពូដឹកខ្ញុំនឹងកូនខ្ញុំពីរនាក់បានទេ? " ។ ពូប្រើយគិតមួយសន្ទុះក៏ឆ្លើយថាៈ "ឌុបក៏ឌុប!កំពុងរកភ្ញៀវមួយព្រឹកគ្មានបានម្នាក់ផងតែមិនមែនពីរនាក់ឯណាក្មួយ ! ក្មួយគិតលុយឱ្យពានាក់ជិះ ទើបត្រឹមត្រូវក្មួយមិនគិតថ្លៃឱ្យអាមួយនៅក្នុងពោះក្មួយឯងនោះផង ម៉េចត្រូវវាធន់ពូដែរតើ!...។ កាព្រឹមសម្លឹងមុខពូប្រើយធ្វើទឹកមុខមាំៈ "យិះពូនេះ! វាធន់ខ្ញុំឯណោះតើពូ ព្រោះខ្ញុំពរវានៅក្នុងពោះខ្ញុំ ពូតវ៉ាអញ្ចឹងម៉េចត្រូវ? " ។ ក្មួយឯងទើបគិតខុសសួរថាតើក្មួយទូលស្រូវមួយល្អីរួចជិះលើខ្នងគោតើគោមិនធន់ឬអី... គោវាធន់ដែរតើ ! ក្មួយក៏មានចំណែកធន់ដែរតែអ្នកត្រូវចេញថ្លៃគឺកូននៅក្នុងផ្ទៃនាង ។ អញ្ចឹងនាងត្រូវចេញជំនួសវាទើបត្រូវ ។ នាងធ្វើមុខក្រញូវៈ "ពូឯងនេះគិតតាំងពី១កាក់១សេនឡើងចោលឱ្យមិនបានទេអី?" ។

-"ចោលម៉េចបាន បើពីព្រឹកដល់ពេលនេះមិនទាន់រកម៉ូយបានមួយផង" ។ នាងទើបនឹកឃើញកន្លែងដែលនាងត្រូវទៅរកប្ដីនាងៈ"ពូប្រើយ មកតាមផ្លូវវត្តចំពុះក្អែកមានឃើញប្ដីខ្ញុំធ្វើការនៅផ្ទះពីណាទេ?" នាយប្រើយ ឆ្លើយយ៉ាងរហ័សៈ "អូវានោះអ្ហា? វាធ្វើនៅក្នុងភូមិគ្រឹះមួយយ៉ាងធំស្កឹមស្កៃហើយមានស្រីក្មេងម្នាក់រស់នៅតែម្នាក់ឯងគត់! ។ កាព្រឹមក្ដៅឆួលៈ "អញ្ចឹងទៅពូគិតថ្លៃពានាក់ ក៏គិតទៅខ្ញុំទៅស៊ីសាច់មីណឹង ទើបបានពូជួយជូនខ្ញុំភ្លាមៗទៅពូខ្ញុំថាពិតជាតាបិប្រុញមានស្រីហើយគាត់ចេះតែប្រកែក.ម្ដងនេះចាំប្រកែកទៀតទៅតាបិប្រុញអើយ ។ ពេលឈរនៅមុខរបងភូមិគ្រិះ នាងបីកូនយំបណ្ដើរ.សម្លឹងទ្វាររបងដែកចាក់សោរជាប់នោះបណ្ដើរ ។ នាងប្រវាចង់ឡើងទ្វាររបងចូលទៅខាងក្នុង ។ ស្រាប់តែ ពូប្រើយស្រែកហៅៈ "នែកុំឡើងរបងប្រយ័ត្នរលូតកូននៃ! មកខាងនេះ ទ្វាររបងតូចសម្រាប់មនុស្សចេញចូលគ្មានចាក់សោរទេ ។ ពូប្រើយ ចូលមុននាំផ្លូវកាព្រឹមនាងលបៗតាមក្រោយដៃម្ខាង បីកូនដៃម្ខាងទៀតស្ពាយកន្ត្រកដាក់អាវខោនឹងកន្ទប ព្រមទាំងដបទឹកដោះគោឱ្យកូនខ្លាចជួបសាហាយរបស់ប្ដីយូពេកកូនឃ្លាន!! ផ្លាស់កន្ទបឱ្យកូនក្រែងកូនជុះ ! ពុទ្ធោអើយកាព្រឹមកម្មពារអីម្ល៉េះៗ ។ កំពុងតែគិត ពូប្រើយបែរក្រោយសម្លឹងនាងៗស្រែកហ្វាស់ៈ"មានរឿងអីពូ ធ្វើឱ្យខ្ញុំអស់ព្រលឹង" ។ ពូប្រើយចងចញ្ចើមៈ"នាងគិតថ្លៃឈ្នួលឱ្យពូប៉ុន្មានដែលនាំនាងចូលលបក្នុងរបងគេយ៉ាងណឹង? អាណឹងស្រួលមិនស្រួលជាប់គុកណាំក្មួយ!" កាព្រឹមលបៗទៅជិត ទើបនិយាយតិចៗល្មម តែនាយប្រើយឮៈ"ពូគិតអីក៏គិតម្ល៉េះចាំយើងនិយាយក្រោយទៅមកដល់ថ្នាក់នេះ ហើយអង្ករទៅជាបាយទៅហើយបើស្ពាយឱ្យទៅជាបរបរតែម្ដង!" ។ "នាងនិយាយភាសាបាលីអីណឹង? បាលីប្រច័ណ្ឌមែនទេ ពូមិនយល់សោះ ។ នាងលួចមើលតាមប្រហោងសោរមិនឃើញអីសោះ.ឃើញតែតុ.ទូ.កៅអី ។ ខំសម៉ំសម្លឹងរកមើលសព្វកន្លែងតែពុំឃើញអ្វីទៀតសោះ ។ ហាក់ឮដូចសម្លេងក្មេងយំនៅឯខាងក្នុង... ឮសូរសម្លេងកូនងាយំហើយស្រាប់តែឮសម្លេងស្រីនិយាយយ៉ាងស្រួយស្រេះ"បងៗបើអញ្ចឹងមិនស្រួលទេ ប្រយ័ត្នរបូតដៃម្ខាងប្រផ្អើបចូលទ្រូង (តទៅទំព័រទី ១៣)

# សកម្មជនគណបក្សមិនហ៊ានឈរឈ្មោះព្រោះខ្លាចខូចប្រយោជន៍

**ដោយ គី សុខលីម** RFI

គណបក្សនយោបាយមួយចំនួនលើកឡើងពីការលំបាកក្នុងការស្វែងរកបេក្ខជនឈរឈ្មោះសម្រាប់ការបោះឆ្នោតឃុំសង្កាត់ ដែលនឹងប្រព្រឹត្តទៅនៅខែមិថុនា



ខាងមុខនេះ ។ សកម្មជនគណបក្សនយោបាយមួយចំនួនហ៊ានគាំទ្រគណបក្សក្នុងចិត្ត ប៉ុន្តែមិនហ៊ានឈរឈ្មោះទេ ពីព្រោះពួកគេខ្លាចប៉ះពាល់ដល់អាជីវកម្ម និងដល់ការងាររបស់ពួកគេ ។

"ហ៊ានគាំទ្រគណបក្សក្នុងចិត្តប៉ុន្តែមិនហ៊ានចេញមុខជាសាធារណៈទេ" ។ នេះជាការលំបាករបស់គណ-បក្សនយោបាយមួយចំនួនក្នុងការស្វែងរកបេក្ខជនឈរឈ្មោះសម្រាប់ការបោះឆ្នោតជ្រើសរើស ក្រុមប្រឹក្សាឃុំសង្កាត់ដែលនឹងប្រព្រឹត្តទៅនៅថ្ងៃទី៣ខែមិថុនាខាងមុខនេះ។

លោក ញែម ប៉ុញ្ញរិទ្ធិ តំណាងរាស្ត្រគណបក្សសិទ្ធិមនុស្សរបស់លោក កឹម សុខា បានថ្លែងប្រាប់នៅថ្ងៃអាទិត្យនេះថា គណបក្សរបស់លោកជួបប្រទះការលំបាកមួយចំនួនក្នុងការស្វែងរកបេក្ខជនឈរឈ្មោះសម្រាប់ការបោះឆ្នោតឃុំសង្កាត់ នៅទីក្រុងភ្នំពេញ។ តំណាងរាស្ត្ររូបនេះបានបញ្ជាក់ថា សកម្មជនរបស់លោកមួយចំនួនដែលជាមន្ត្រីរាជការ និងជាអាជីវករហើយស្រលាញ់គណបក្សសិទ្ធិមនុស្សនោះ មិនហ៊ានឈរឈ្មោះទេពីព្រោះពួកគេខ្លាចខូចប្រយោជន៍របស់ពួកគេ ។ ពួកគេមិនឈរឈ្មោះមែន ប៉ុន្តែពួកគេនៅតែបន្តគាំទ្រគណបក្សសិទ្ធិមនុស្សពីក្រោយ ។

គណបក្សសិទ្ធិមនុស្សដែលមានតំណាងរាស្ត្រចំនួន៣រូប ទើបចូលរួមការបោះឆ្នោតឃុំសង្កាត់លើកទីមួយនៅឆ្នាំ២០១២នេះ ។ គណបក្សសិទ្ធិមនុស្សដែលមានបេក្ខជនឈរឈ្មោះក្នុងឃុំសង្កាត់ចំនួន១១៣២ ក្នុងចំណោម ឃុំសង្កាត់១៦៣៣បានបង្ហាញក្តីសង្ឃឹមថា គណបក្សនឹងទទួលបានអាសនៈក្រុមប្រឹក្សាឃុំសង្កាត់នៅគ្រប់ឃុំសង្កាត់ដែលបានដាក់បេក្ខភាព ។

គណបក្សនរោត្តម រណឫទ្ធិ ដែលមានសមាជិកសភាចំនួនពីររូប បានចុះបញ្ជីបេក្ខជនក្នុងឃុំសង្កាត់១០៥០លើ១៦៣៣ឃុំសង្កាត់ នៅទូទាំងប្រទេស ។ លោក ប៉ែន សង្ហារ អ្នកនាំពាក្យគណបក្សរាជានិយមមួយនេះបានលើកឡើងដូចគ្នា ទៅនឹងគណបក្សសិទ្ធិមនុស្សដែរ ពីបញ្ហាលំបាកក្នុងការស្វែងរកបេក្ខជនឈរឈ្មោះ ។ លោក សង្ហារ បានបញ្ជាក់ថា ក្នុងគណបក្សរបស់លោកមានអ្នកសម្រេចចិត្តឈរឈ្មោះហើយ ប៉ុន្តែក្រោយមកបន្តិចសុំលាលែងវិញ ។ បើយោងតាមការសន្និដ្ឋានរបស់លោកនេះ គឺបណ្តាលមកពីការទិញទឹកចិត្តឬការគំរាមកំហែង ។ ប៉ុន្តែទោះជាយ៉ាងណាក៏ដោយក៏អ្នកនាំពាក្យរូបនេះនៅតែសង្ឃឹមថា គណបក្សនឹងទទួលបានជ័យជំនះច្រើនជាងការបោះឆ្នោតឃុំសង្កាត់កាលពីឆ្នាំ២០០៧កន្លងមក។

ងាកមកនិយាយពីគណបក្សសមរង្ស៊ីឯណេះវិញ លោក យឹម សុវណ្ណ អ្នកនាំពាក្យគណបក្សបានថ្លែងថា ការគំរាមកំហែងនិងការរើសអើងនយោបាយ មកលើសកម្មជននយោបាយនៅតែមាន ។ ប៉ុន្តែសកម្មជនរបស់



គណបក្សសមរង្ស៊ីមានសេចក្តីក្លាហានមោះមុតណាស់ ។ មានមែនការរើសអើង ប៉ុន្តែសកម្មជនរបស់គណបក្សសមរង្ស៊ីដណ្តើមគ្នាឈរឈ្មោះ ។ ឈរឈ្មោះដោយមិនញញើត ។

លោក ទេព នីថា អគ្គលេខាធិការនៃគណៈ



កម្មាធិការជាតិរៀបចំការបោះឆ្នោតបានបង្ហាញតួលេខបណ្តោះអាសន្នថា គណបក្សចំនួន១១បានចុះបញ្ជីចូលរួមបោះឆ្នោតប្រកួតប្រជែងកាន់កាប់តំណែងឃុំសង្កាត់ចំនួន១៦៣៣នៅទូទាំងប្រទេស ។ ប្រជាពលរដ្ឋខ្មែរចំនួន៩លាន២សែននាក់ បានចុះឈ្មោះរួចរាល់ហើយ ដើម្បីចូលរួមការបោះឆ្នោតឃុំសង្កាត់នៅថ្ងៃទី៣ខែមិថុនាខាងមុខនេះ។

**អត្ថបទចុះផ្សាយនៅថ្ងៃ អាទិត្យ ០៤ មីនា ២០១២**

# ភោជនីយដ្ឋាន គុជក្រុងចិនថ្មី

**ដោយ : សុបិន**

"គុជក្រុងចិន ឬ New China Pearl" ជាឈ្មោះ ភោជនីយដ្ឋានមួយស្ថិតនៅពាក់កណ្ដាលផ្លូវពីទីក្រុង ឡូវែលទៅលីន-រីវែរនៃរដ្ឋម៉ាសាឈូសែត ។ គេអាចមើលឃើញអាគារចំឡែកពណ៌ក្រហមពីផ្លូវធំមាន រាងដូចជាប្រាសាទ ឬវាំងនៃស្រុកចិនបុរាណស្ថិតស្ថេរលើទីធ្លាដ៏ធំទូលាយ ហើយមានចំណាស់ប្រមាណ៣០ឆ្នាំហើយ ។ ភោជនីយដ្ឋានដែលមានរក្សាក្បូរក្បាច់វប្បធម៌បុរាណរបៀបនេះ គេមិនសូវឃើញមានសូម្បីតែនៅ "ឆាយណាថោន" នៃទីក្រុងបូស្តុនក៏មិនសូវប្រទះផង។

ទាក់អារម្មណ៍បានពីខាងក្រៅហើយ ដល់ចូលដល់ក្នុងការតាំងលំអរក្បូរក្បាច់បុរាណនៅតែបន្តដល់ក្នុងសាលដ៏ធំទូលាយចែក ជាច្រើនបន្ទប់ដើម្បីទទួលភ្ញៀវបានរហូត ៤-៥០០ នាក់ បន្ទប់កញ្ចក់ដ៏ធំវែង លំអរដោយនាគរាជពណ៌លឿងដំណាងឱ្យបន្ទប់ស្ដេចក្រុងចិន ទីនោះជាកន្លែងទទួលភេសជ្ជៈ និងកំសាន្តល្បែងអេឡិចត្រូនិចនានា ។



មុននឹងចូលសាលភោជនាហារមានរង្វង់ទទួលភ្ញៀវមួយលំអរដោយក្បាច់ចម្លាក់ល្អៗធ្វើឱ្យ មានអារម្មណ៍ថាជាទីទទួលភ្ញៀវសំខាន់បំផុតសម្រាប់នរណាដែលបានមកដល់ទីនេះ ។ ខាងក្នុងមានបន្ទប់បីបួនទៀត រៀបជារង្វង់មូលនៅកណ្ដាល លំអរដោយក្បាច់ក្បូរ ជាឈើ ជាកញ្ចក់ជារូបចម្លាក់ ឬចង្កៀងក្បាច់ជំនាន់ចាស់ មកតាំងលំអរតាមផ្លូវឬតាមជញ្ជាំង ឬនៅពិដាន ដែលធ្វើឱ្យភ្ញៀវយល់ថា អ្នកម្ចាស់ហាងរូបនេះចេះណែនាំយកសិល្បៈជាវប្បធម៌ចិន មកធ្វើឱ្យជនគ្រប់រូប ចេះស្រឡាញ់ និងលំអរទាំងនោះបានយ៉ាងប្រសើរ។








ម្ចាស់ហាងឈ្មោះ ម៉ាក វ៉ង Mark Wong មកពីខេត្តកង់តុងប្រទេសចិន ជាមួយក្រុមគ្រួសារតាំងពី ៣០ឆ្នាំមុន មករស់នៅកាលីហ្វ័រញ៉ៀ តែដោយសារការរញ្ជួយដីដ៏ខ្លាំងនៅទីនោះ គាត់ក៏ភៀសខ្លួនមកនៅបូស្តុន ហើយធ្វើការនៅភោជនីយដ្ឋាន ទីនោះច្រើនឆ្នាំមុនមកដល់ "គុជក្រុងចិន" នេះជិត ២០ ឆ្នាំហើយ ។ ម៉ាកបាននាំមកបង្ហាញមុខម្ហូបច្រើនមុខហើយនិយាយថា "ភ្ញៀវណាដែលមិនចង់ទៅឆ្ងាយដល់បូស្តុនអាចរក ម្ហូបអាហារចិន គ្រប់យ៉ាងនៅហាងខ្ញុំ មិនចាំបាច់ទៅដល់ឆាយណាថោននោះទេ" ។ នៅ"ឆាយណាភើល" នេះមានម្ហូបចំហុយឆ្អិនស្រាប់ហៅថា ឌិម ស៊ុម គ្រប់មុខ បំរើនៅក្ដៅហុយៗគួរឱ្យស្រក់ទឹកមាត់ ឬក៏ម្ហូប ដែលបញ្ជាឱ្យចំអិនមានឆាបង្កង ឬស៊ុប ឬសម្ល គ្រឿងបំពង ។ល។ ដែលលោក វ៉ង បន្តថា "ម្ហូបចិន តំបន់កំម៉ង់ពីខាងជើងដល់ត្បូងហាងខ្ញុំអាចបំពេញ បំណងបានទាំងអស់" ។



ម៉ាកបានតែងខ្លួនសំលៀកបំពាក់ស្រស់ស្អាតដើម្បីមកបង្ហាញ ម្ហូបដល់យើង តែតាមពិត ម៉ាកនិយាយថា "ខ្ញុំធ្វើការនៅហាងនេះ តាំងពីលាងចានដល់បោសផ្ទះ រួចធ្វើម្ហូប រួចបំរើតុ ខ្ញុំស្គាល់នឹងបានធ្វើការងារទាំងអស់នេះយ៉ាងយូរ ឆ្នាំក្រោយមកខ្ញុំក៏បានបំរើនៅកន្លែងលាយស្រាបានច្រើនឆ្នាំថែមទៀត ដែលនៅទីនោះធ្វើឱ្យខ្ញុំស្គាល់ភ្ញៀវបានច្រើន" ។ ភ្ញៀវរបស់ "ឆាយណាភើល" ថ្ងៃនោះ មានពួកអាមេរិកាំងជាច្រើននៅផ្នែកខាង "បា" ដែលមានលក់ភេសជ្ជៈ តែក្រុមអាស៊ីតិចតួច បើនៅក្នុងសាលខាងភោជនាអាហារវិញ មានជនអាស៊ីច្រើនជាងអាមេរិកាំងហើយ យើងក៏ឃើញគ្រួសារខ្មែរ២-៣គ្រួសារ ដែលនិយាយខ្មែរចេចចាចមកហាងនោះដែរ ។ ម៉ាកបានភៀសខ្លួនមកពីប្រទេសចិន ពី៣០ឆ្នាំមុនដោយសារ "ខ្ញុំត្រូវការសេរីភាពនៅ កង់ តុង ខ្ញុំមិនអាចធ្វើអ្វីបានទេ ! តែខ្ញុំ ក៏ពុំដែលស្រម៉ៃឃើញថា ខ្ញុំនឹងក្លាយទៅជាម្ចាស់នៃភោជនីយដ្ឋានដ៏ធំនេះតែម្នាក់ឯងនោះ...នៅពេលដែលម្ចាស់ហាងមុនគេចង់ឈប់ធ្វើភោជនីយដ្ឋាន គេក៏សេងឱ្យខ្ញុំក្នុងតម្លៃល្អខ្ញុំក៏ទទួលតាមកំលាំងដែលខ្ញុំមានពុំចាំបាច់មានដៃគូទេ... កម្លាំងខ្ញុំគឺ ខ្ញុំស្គាល់ភ្ញៀវច្រើននៅពេលខ្ញុំធ្វើការនៅលាយសុរា ហើយខ្ញុំដឹង នឹងស្គាល់កិច្ចការគ្រប់កន្លែងទាំងអស់ នៅក្នុងហាង...ហេតុនេះហើយបានជាខ្ញុំហ៊ានប្រថុយយក "គុជក្រុងចិន" នេះមកកាន់។

ម៉ាកពុំមែនធ្វើការតែម្នាក់ឯងទេ ភរិយាក៏នៅកាន់ការងារ "ឆាយនាភើល" យ៉ាងរឹងមាំជាមួយគ្នាដែរ ទាំងពីរនាក់មានកូនបី ដែលម៉ាកនិយាយថា "សុទ្ធតែរៀនសូត្រប្រសើរទាំងអស់...ចំណែកខ្ញុំពុំបានរៀននៅសាលាណា ទេ គឺនៅសាលាកន្លែងធ្វើការទាំងអស់ទាំងភាសាអង់គ្លេស ក៏ដូចចំណេះខាងភោជនីយដ្ឋាន" ។ ម៉ាក បានគិតមិនខុសមែន កាលពី៣០ឆ្នាំ មុនថ្ងៃនេះគាត់អាចនិយាយបានហើយថា "ទាល់តែគាត់មានសេរីភាពពិតប្រាកដ ទើបគាត់នឹងក្រុមគ្រួសារអាចទទួលសំណាងពីប្រទេសនៃភ័ព្វសំណាងនៃ ស.រ.អា នេះបាន"។ ថ្ងៃនេះយើងពុំអាចបង្ហាញរូបថតនៃគ្រួសារតំរូនេះបាននៅឡើយ យើងសង្ឃឹមថា អ្នកស្រីវ៉ង នឹងបង្ហាញខ្លួននៅថ្ងៃក្រោយជាមិនខាន៕



តមកពីទំព័រទី ១

# ក្រុមទីប្រឹក្សាសាលាក្រុងហ្វីឡាដែលហ្វៀ...

ជាជនភៀសខ្លួនដូច ជាភូមា-ការ៉ែន ឬឥណ្ឌូណេស៊ី-ណេប៉ាល់។ ក្រុមប្រជាជននោះពុំមានអ្នកតំណាងហើយ យើងអញ្ជើញពួកគាត់ឱ្យមកប្រាប់យើងពីសេចក្តីត្រូវការរបស់គាត់ពីបញ្ហារកផ្ទះសម្បែងបញ្ហាសន្តិសុខ ដូចជាដើរយប់ព្រលប់ មានគេលបវាយ...។ល។ រឿងទាំងនេះ យើងនឹងនាំទៅប្រាប់សាលាក្រុង និងតាមដានដើម្បីជម្រាបឱ្យលោកចៅហ្វាយក្រុងមានវិធានការណ៍សម្រាប់ជួយដល់អ្នកទាំងនោះវិញ ។ បើចង់ទាក់ទងរកខ្ញុំ គឺទូរស័ព្ទមក "United Community" ២១៥ ៤៦៧ ៨៧០០ ២១៩ នៅជ្រុងផ្លូវលេខ៨ និងSnyder -នៅទីនោះគេមានបើកបង្រៀនភាសាអង់គ្លេសជូនសាធារណជនពីថ្ងៃច័ន្ទ ដល់ថ្ងៃសុក្រ ពេលព្រឹកពីម៉ោង១០ដល់១២ និងល្ងាចពីម៉ោង៦ដល់៨។

**Mary Yee អ្នកស្រី ម៉ារី យី** ទីប្រឹក្សាសាលាក្រុងខាងកិច្ចការអាស៊ានអាមេរិកាំង ឥឡូវនេះបន្តការសិក្សាថ្នាក់បណ្ឌិតខាងផ្នែកអប់រំ។



"ថ្ងៃនេះយើងជួបក្រុមជនភៀសខ្លួនភូមាយើងចង់ឮអ្នកទាំងនោះ ប្រាប់យើងពីសេចក្តីត្រូវការរបស់ ពួកគេហើយនៅអនាគតមកយើងនឹងត្រឡប់មកម្តងទៀតនៅទីនេះ ឬទីផ្សេងដើម្បីប្រាប់ពីវិធានការណ៍ថាតើយើងនឹងធ្វើអ្វីខ្លះ ដើម្បីនឹងជួយក្រុមអ្នកមកថ្មីទាំងនោះ ឬក៏អ្នកដែលបានមកដល់ច្រើនឆ្នាំមកហើយ ដោយសារយើងដឹងថា ពួកអ្នកមកដល់ទីថ្មីត្រូវការពេលច្រើនឆ្នាំ ដើម្បីទម្លាប់នៅក្នុងសង្គមអាមេរិកាំង ។ ដូចជារូបខ្ញុំដែលជាកូនចិនមកដល់ ស.រ.អា ក្រោយសង្គ្រាមលោកទី២ យើងបានយល់ពីការលំបាកនេះយើងសង្ឃឹមថា អាចនឹងជួយអ្នកទាំងនោះបាន ។ បើចង់ទាក់ទងរកខ្ញុំសូមផ្ញើរសារ តាមរយៈកាសែតខ្មែរផូសគេនឹងបញ្ជូនមកដល់ខ្ញុំបាន"។

**នីណា អាម៉ាដ Nina Ahmad** ប្រធានក្រុមទីប្រឹក្សាចៅហ្វាយក្រុងខាងកិច្ចការអាស៊ានអាមេរិកាំង



"ខ្ញុំមកស្តាប់វត្ថុបំណងនៃអ្នកទាំងអស់គ្នា ហើយឱ្យប្រាកដក្នុងចិត្តថា អ្នករស់នៅហ្វីឡាដែលហ្វៀនេះ បានទទួលសេវាពីសាលាក្រុងបានគ្រប់ៗគ្នា ហើយមានការស្វាគមន៍យ៉ាងកក់ក្តៅ។ ថ្ងៃនេះយើងបានឮអំពីការព្រួយបារម្ភពីក្រដាសស្នាមអន្តោប្រវេសន៍ ជា**ទី១** -**ទីពីរ**ពីការងារចិញ្ចឹមជីវិត **ទី៣**ការធានាដល់សុខភាពដូច្នេះយើងត្រឡប់មកវិញ ជាមួយអ្នកឯកទេសនាំចម្លើយមកជូនវិញនៅពេលក្រោយ។

បើចង់ទាក់ទងរកយើងខ្ញុំសូមចូលក្នុងវេបសាយរបស់យើង ឬក៏ទូរស័ព្ទទៅលេខ ២៦៧ ៣០៤ ១៦៧០"។



**អេនឌី ថយ Andy Toy** ទីប្រឹក្សាចៅហ្វាយក្រុងហ្វីឡាដែលហ្វៀខាងពាណិជ្ជកម្មខ្នាតតូច "ខ្ញុំមកជាតំណាងគណកម្មាការសាលាក្រុងផង ហើយខ្ញុំក៏ចង់ណែនាំឱ្យមានការបើកពាណិជ្ជកម្ម ដោយក្រុមអ្នកមកដល់ថ្មី ដែលយើងអាចជួយឱ្យបើក ឬណែនាំឱ្យមានឯករាជ្យហិរញ្ញវត្ថុទៀតផង។



បើចង់ទាក់ទងរកខ្ញុំ ២១៥ ២៤៣ ៤១០១ នៅកន្លែងយើងមានធនធានច្រើនសម្រាប់ជួយ"។

**ថយ ង្វៀង Thoai Nguyen** ទីប្រឹក្សាចៅហ្វាយក្រុងហ្វីឡាដែលហ្វៀនាយកប្រតិបត្តិ "ស៊ីម៉ាក់"



"ខ្ញុំមកស្តាប់ប្រជាពលរដ្ឋមកដល់ថ្មី ហើយធ្វើយ៉ាងណាឱ្យមានការទទួលសេវាសុខភាពអប់រំ និងសេវារបស់ក្រុង ។ យើងធ្វើកិច្ចប្រជុំរបៀបនេះច្រើនដងក្នុងមួយឆ្នាំៗ ដើម្បីជួបសហគមន៍ដើម្បីដោះស្រាយការទាមទាររបស់ពួកគេ។

បើចង់ទាក់ទងខ្ញុំសូមទូរស័ព្ទទៅ "ស៊ីម៉ាក់" ២១៥ ៤៦៧ ០៦៩០"។

**ដោយ : ខ្មែរផុស**

# សារព័ត៌មានខ្មែរប៉ុស្ដិ៍ ស.រ.អា.លេខ១០០ភាគ២



តពីលេខមុន

ដោយ : គឹម ភឿន

ដើម្បីឱ្យមិត្តអ្នកអានដែលមិនបានជ្រាបពីការងារ យើយបានធ្វើកន្លងមក ហើយកំពុងបន្តដំណើរទៅមុខទៀត បានងាយយល់នឹងអាចចូលរួមជាមួយយើងខ្ញុំបាននោះ ខ្ញុំសុំជំរាបថា យើងខ្ញុំបានប្រមូលផ្ដុំគ្នាជាមួយកម្លាំងក្រុមសារព័ត៌មានខ្មែរផូសត៍សហរដ្ឋអាមេរិក បង្កើតជាក្រុមមួយឈ្មោះថា "សមាគមគាំទ្រគ្រួសារខ្មែរ" ។ ទោះមិនទាន់បានពេញមុខពេញមាត់ជាសមាគមមួយនៅឡើយក៏ដោយ តែក្រុមនេះបានបញ្ចេញ សកម្មភាពអស់រយៈពេលពាឆ្នាំមកហើយ មិនហ៊ានឱ្យគេដឹងក្ដីទុក្ខរបស់គ្រួសារខ្លួន ហេតុនេះហើយមានវិបត្តិធំៗ កើតឡើងគួរឱ្យស្ដាយព្រោះវិបត្តិទាំងនោះបើគេដឹងមុន គេនឹងទប់ស្កាត់មិនឱ្យកើតឡើងបានឡើយ ។ យកឧទាហរណ៍វិបត្តិដ៏ធំធេងកើតឡើងក្នុងគ្រួសារលោក ពូ ម៉ៅម៉ន បណ្ដាលឱ្យកូនស្រីគាត់ចាក់សម្លាប់ចៅគាត់អស់ដល់ទៅ២នាក់ ក្នុងករណីជួយប្រមូលកូនខ្មែរដែលបោះបង់សាលារៀន ឱ្យត្រឡប់មករៀនសូត្រសារជាថ្មី ។ បើសាលាបានបណ្ដេញក្មេងដោយកំហុសឆ្គងអ្វីមួយឱ្យចេញពីសាលា ក្រុមយើងជាអ្នកទៅសុំឱ្យចូលរៀនវិញ ប្រសិនបើសាមីខ្លួន នៅតែចង់រៀនតទៅទៀត ។ តាំងពីដើមមកគ្រួសារខ្មែរយើងចេះតែមានភាពខ្មាស់អៀន

ឯកូនស្រីគាត់កំពុងជាប់នៅក្នុងការ ឃុំឃាំងឃ្លាំមើលកុំឱ្យវិបត្តិកើតឡើងលើខ្លួននាងទៀត ។ ដោយសារវិបត្តិគ្រួសារលោក ម៉ៅម៉ន ក្រុមសមាគមគាំទ្រគ្រួសារខ្មែរនៅហ្វីឡាបានសង្គ្រោះទាន់ពេល ចំពោះគ្រួសារខ្មែរមួយដែលមានរឿងស្រដៀង គ្នារៀបកើតឡើងតែបានមកទាក់ទងទាន់ពេលវេលាក្រុមយើងបានទៅរំលត់វិបត្តិបានភ្លាម សាមីខ្លួនបានជាស្រួលបួលហើយក៏មានបំណងទៅបន្តការសិក្សាឡើងវិញ ដើម្បីអនាគតគ្រួសារជាថ្មីវិញដែរ ។ សុំអភ័យទោសមិនហ៊ានជូនឈ្មោះ និងអាស័យដ្ឋានច្បាស់លាស់ ដោយពុំបានសុំការអនុញ្ញាតពីសាមីជន ។ បើមិនប្រាប់កន្លែងរមាស់ តើគេម៉េចនឹងជួយអេះបាន? ។ ដោយសារការស្រាវជ្រាវរបស់ក្រុមយើងខ្ញុំនេះ យើងបានដឹងថាសិស្សខ្មែរយើងបានបោះបង់សាលាមានចំនួនពី៦០ទៅ៧០ភាគរយ គិតពីសិស្សបឋមសិក្សារហូតវិទ្យាល័យ មកពីបុព្វហេតុច្រើនយ៉ាង ។ យើងសុំអំពាវនាវដល់បងប្អូនខ្មែរគ្រប់គ្រួសារទាំងអស់ សូមឱ្យបើកចំហររឿងគ្រួសារឱ្យគេឯងបានដឹង ពិសេសឱ្យក្រុមសមាគមគាំទ្រគ្រួសារខ្មែរនៅហ្វីឡាបានជ្រាប ដើម្បីជួយកុំឱ្យមានវិបត្តិដែលមិនគួរកើតឡើងទៅជាកើតឡើងបានគួរឱ្យស្ដាយ! ចាប់ពីពេលនេះទៅ បើអស់លោកមានវិបត្តិដូចជា: -ព្រួយចិត្តយ៉ាងខ្លាំង ឬមានការអស់សង្ឃឹមយ៉ាងខ្លាំង -បាត់ការចូលចិត្តធ្វើអ្វីៗ ដូចជាការងារសព្វមួយដង ឬកិច្ចការកំសាន្តដែលធ្លាប់តែចូលចិត្តធ្វើ ឬអនាម័យសម្រាប់ខ្លួន -ភាពដេកមិនលក់រាំរ៉ៃ, មិនឃ្លានមិនស្រេក, ស្រកទម្ងន់, អស់កម្លាំងរាំរ៉ៃ, មានទុក្ខកង្វល់មិនទៀងទាត់, ការធ្លាក់ទឹកចិត្ត, ការតក់ស្លុត, ឬកង្វល់យ៉ាងខ្លាំងក្នុងករណី: ដូចបេះដូងដើរញាប់ ដោយសម្ពាធឈាមឡើង, ឈឺក្រពះ, ភ័យញ័រ, ព្រួយដោយមិនចង់កាន់ការអ្វីទាំងអស់, មានការអស់សង្ឃឹមជាខ្លាំង ។ល។ នឹង ។ល។... នឹងនៅមានច្រើនទៀត សូមអស់លោកអ្នកមានរោគសញ្ញាដូចបានពិពណ៌នាខាងលើ ឬប្លែកពីនេះទៀត សូមអញ្ជើញមកជួយយើងខ្ញុំ យើងខ្ញុំនឹងជួយដោះស្រាយ ដោយពឹងផ្អែកទៅលើក្រសួងជំនាញផ្សេងៗជូនលោកអ្នកបាន ដោយគ្មានគិតកំរៃឡើយ ។ កុំលាក់លៀមឱ្យវិបត្តិកើតឡើងបានឱ្យសោះ ។

មិនមែនមានតែប៉ុណ្ណឹងទេ ក្នុងពាឆ្នាំនេះយើងបានជួយឱ្យកូននឹងឳពុកម្ដាយដែលនិយាយមិនត្រូវគ្នា, ជួបមុខគ្នាមានតែបោកចានបោកឆ្នាំង ជេរដាក់បណ្ដាសារ ។ល។ ក្រុមយើងខ្ញុំបានផ្សះផ្សាយ៉ាងរលូន, កូនអាចវិលទៅសាលាវិញ មកពីសាលាចេះជួយសំអាតផ្ទះជួយលក់ដូរម្ដាយ, ចេះហៅម៉ែនិយាយទៅកាន់ម៉ែថាកូនៗ ។ ក្រុមយើងក៏បានសុំឱ្យកូនៗដែលរង្គយកទៅចិញ្ចឹមមកឱ្យម្ដាយឳពុកវិញបានមួយចំនួនដែរ សូមឱ្យមានគំនិតជានិច្ចថា យើងមកនៅប្រទេសមួយដែលមានវប្បធម៌ប្លែកពីយើង ត្រូវរៀនរស់នៅរបៀបស្រុកនេះ កូនចៅយើងវាមិនអាចយល់តាមយើងបានទេ យើងរៀនយល់តាមវាវិញ ទើបអាចរកភាពសុខដុមរមនាទៅកើត ។

បើលោកអ្នកចង់ចេះរបៀបដោះស្រាយជាមួយកូនចៅ យើងនៅស្រុកនេះឱ្យមានភាពរលូន សូមចូលរួមជាមួយយើងខ្ញុំក្នុងនាទីជួបជាមួយអ្នកជំនាញដែលតែងមកជួយណែនាំ "សមាគមគាំទ្រគ្រួសារខ្មែរ" យើងខ្ញុំបានចូលរួមរៀនសូត្រចប់វគ្គ នឹងបានទទួលសញ្ញាប័ត្រមួយសន្លឹកផង ហើយអាចជួយឱ្យលោកអ្នកបានរស់នៅសុខសាន្តជាមួយកូនចៅផង ។ នៅពេលខ្លីខាងមុខនេះ សមាគមគាំទ្រគ្រួសារខ្មែរនឹងធ្វើបុណ្យផ្កាវៃរបច្ច័យមួយ ដើម្បីធ្វើឱ្យសមាគមនេះបានពេញលេញជាសមាគមមួយអាចបំរើបងប្អូនរួមឈាមយើង ពេញដៃពេញជើង ព្រោះពាឆ្នាំកន្លងទៅនេះយើងខ្ញុំទាំងអស់គ្នាបានរៀប ចំខ្លួនឱ្យចាស់ទុំ ល្មមក្នុងកិច្ចការបំរើសហគមន៍ខ្មែរ ក្នុងផ្នែកមួយជួយដោះស្រាយវិបត្តិផ្សេងៗដែលបានរៀបរាប់ខាងលើនេះ ។

យើងឃើញថា សារព័ត៌មានខ្មែរផូសត៍សហរដ្ឋអាមេរិកមិនមែនគិតតែសរសេរព័ត៌មានមួយមុខដូចសារព័ត៌មានឯទៀតនោះទេ តែមានបំណងបបួល, អំពាវនាវបងប្អូនរួមឈាម ឱ្យខំប្រឹងនាំគ្នាប្រកៀកស្មាជួយដោះស្រាយកិច្ចការច្រើនផ្នែកនៃសង្គម ដែលយើងចាញ់ឆ្ងាយជនជាតិដទៃ ។ កិច្ចការទាំងនេះយើងមិនអាចធ្វើម្នាក់ឯងកើតទេ ឱ្យតែយើងចេះនាំគ្នាបង្កើតវត្តបាន យើងក៏អាចរួមគ្នាយើងអាចធ្វើកិច្ចការធំៗនោះ បានមិនដល់ថ្នាក់ធ្វើពុំកើតនោះទេ គ្រាន់តែការគ្រប់គ្រងឱ្យមានវិទ្យាសាស្ត្រគ្រប់គ្រាន់ កុំឱ្យដូចគ្រប់គ្រងវត្តអារាម តទៅទំព័រទី ១៤







ស្លាបនិកកាសែតខ្មែរប៉ុស្ដិ៍សហរដ្ឋអាមេរិក

លេខ១៣

លេខ១០១

ខ្មែរប៉ុស្ដិ៍ Khmer Post

KHMER BILINGUAL BIWEEKLY NEWSPAPER

"NEW YEAR BABY"

KhmerPost USA

សត្រូវរបស់ប្រជាជន ENEMIES OF THE PEOPLE

300+ Cars a week

VMART





## សិក្ខាសាលាស្ដីពីការទិញផ្ទះលើកទី១

## First Time Home Buyer Workshops



សូមអញ្ជើញចូលរួមជាមួយយើង ដើម្បីរៀបចំខ្លួនទិញផ្ទះទី១របស់លោកអ្នកឲ្យបានពីរដងក្នុង១ខែ នាឆ្នាំ២០១២ នេះ យើងនឹងបង្រៀនលោកអ្នកមួយជំហ៊ានម្ដងៗរៀបចំឲ្យចេញពីBad Credit ឬគ្មាន Credit ទៅរកថវិការ ទៅសំណើរសុំខ្ចីប្រាក់ទិញផ្ទះនឹងទៅរកសោនៃផ្ទះរបស់លោកអ្នកបានសេវាយើងនេះមិនមានយកកំរៃនិយាយ ភាសាខ្មែរ ហើយគ្មានចេញថ្លៃអ្វីទាំងអស់ បើលោកអ្នកមានបញ្ហាត្រូវគេរឹបអូសយកផ្ទះយើងក៏អាចជួយ បានដែរ -សូមអញ្ជើញទូរស័ព្ទរកដេវីដ អូ សេង ថ្ងៃនេះ បើចង់ដឹងព័ត៌មានពីការទិញផ្ទះនេះ បន្ថែម ឬក៏ចង់ ដឹងថា តើ យូណាយតិក អាចជួយលោកអ្នកបានប៉ុណ្ណា? គឺទូរស័ព្ទ 215-467-8700 x219

សូមអញ្ជើញចុះឈ្មោះថ្ងៃនេះ ដើម្បីចូលសិក្ខាសាលាតាមថ្ងៃខែដូចតទៅ:

ថ្ងៃអង្គារ៍ ៣១ មករា ២០១២ពីម៉ោង ៥:៣០ដល់៩:៣០ ល្ងាច

ថ្ងៃព្រហស្បត្តិ៍ ១៦ កុម្ភៈ ២០១២ ពីម៉ោង ៥:៣០ ដល់៩:៣០ល្ងាច

ថ្ងៃអង្គារ៍ ២៨ កុម្ភៈ ២០១២ ពីម៉ោង ៥:៣០ ដល់ ៩:៣០ ល្ងាច

ថ្ងៃព្រហស្បត្តិ៍ ១៥ មិនា ២០១២ ពីម៉ោង ៥:៣០ដល់៩:៣០ល្ងាច

ថ្ងៃអង្គារ៍ ២៧មិនា ២០១២ ពីម៉ោង ៥:៣០ ដល់៩:៣០ល្ងាច

ព័ត៌មានបន្ថែមស្ដីពីសិក្ខាសាលាសូមអញ្ជើញទូរស័ព្ទទៅ 215-467-8700

United Communities of Southeast Philadelphia

2029 s. 8 TH Street.
(8th & Snyder Ave)
Philadelphia, PA 19148

Tel. 215 -467-8700 ext. 220
Fax: 215 -467-1042
www.ucsep.org

United Communities Southeast Philadelphia

តមកទំព័រទី ៨

## អ្នកប្រចណ្ឌប្ដីជាប់លេខ...

បងដៃម្ខាងទៀត ទ្រពីក្រោម គូថ... អើ!អញ្ចឹងទើប ត្រូវឃើញទេអញ្ចឹងវាស្រួលជាងមុនមែនទេ?"។ កាព្រឹមច្រាស់ច្រាលនៅសៀម រង់ចាំមើលទៀតលែង កើតបែរមករកពូប្រើយៈ "បែបវានៅខាងក្នុងបន្ទប់ មើលវាមិនឃើញសោះ ឥឡូវកូនង៉ាលែងយំទៀត ហើយ ប្រហែលពួកវាកំពុងអ៊ីៗ នឹងគ្នាហើយ! ខ្ញុំធាក់ទ្វារទំលាយចូលណាំពូ ប្រើយខ្ញុំទៅស៊ីសាច់វា ក្នុងពេលវាអ៊ីៗនឹងប្ដីខ្ញុំ ។ នាយប្រើយហាមមិនទាន់ កាព្រឹមធាក់ទ្វារមួយកម្លាំង"គ្រាំង"ៗ សមទ្វារអត់មានខ្ទាស់គន្លឹះផងក៏របើកខ្ទាកល្ហធេង ក៏ឃើញនាយប្រុញកំពុងអង្គុយបីកូនង៉ាបំបៅទឹកដោះ គោឯម្ដាយវាកំពុងអង្គុយលើកៅអីមួយទៀតក្បែរ នោះចាំប្រាប់របៀបធ្វើឱ្យបានត្រឹមត្រូវ ។ ម្នាក់ៗ វាក់អើ ស្រឡាំងកាំងកាព្រឹមរហ័សដូចផ្លែកបន្ទោរបីកូនទៅហុចឱ្យប្ដី:"នែ! តាបិប្រុញកូនឯងមានមិនព្រមនៅផ្ទះបីទេ ម៉េចបានជាមកបីកូនគេវាជាកូនតាបិប្រុញឯងដែរឬ? អញ្ចឹងហើយបាជាវហាន់មកជួបម៉ែកូនវាមែនទេ?"។ នាងម្ចាស់ផ្ទះត្រូវគេប៉ះពាល់កិត្តិយសក្រោកឈរសំឡុត:"នែ! អ្នកឯងជាអ្នកណា? ជាចោរប្លន់ទំលាយទ្វារចូលមកប្លន់ផ្ទះយើងឬ ? ពូអីគេនោះទៀតដឹងថា ប្ដីយើងមិននៅផ្ទះនាំគ្នាមកប្លន់ឬ?។ ពូប្រើយ លុតជង្គង់ចុះគ្រីបហាមាត់និយាយមិនចេញសំឡេង ដៃទាំងពីរសំពះទឹកមុខឡើងស្លាំងអត់មានឈាមសោះ ។ នាយប្រុញដាក់កូនង៉ាចុះលើកដៃសំពះសុំទោស:"សុំទោសលោកស្រីវាជាប្រពន្ធខ្ញុំ វាតាមរកប្រច័ណ្ឌខ្ញុំ ឯពូខាងនោះឈ្មោះពូប្រើយអ្នករត់កង់ឌុបនៅភូមិអូរអណ្ដូង គាត់ឌុបប្រពន្ធខ្ញុំមក ហើយមើលទៅគាត់ជាមនុស្សល្អទេលោកស្រី" ។ នាយប្រើយដៃទាំងពីរសំពះជាប់ ទើបហាមាត់និយាយបានដោយជាប់ៗ:"បាទ!បាទ... ល្អទេបាទ"ម្ចាស់ផ្ទះបន្ធូរសម្លេង:"ពូចង់អី ទើបទំលាយទ្វារចូលមិនសុំអនុញ្ញាតពីម្ចាស់ផ្ទះគេសិន?-"អត់មាន... អត់មាន!"។ ម្ចាស់ផ្ទះងឿងឆ្ងល់សម្លឹង នាយប្រើយ ឡេងឡង់នាយប្រុញឆ្លើយកាត់:"គាត់ចង់ថា គាត់អត់មានទំលាយទ្វារទេ មើលទៅ "ហើយបែរមកពូប្រើយៈ "មែនទេពូប្រើយ?"។ នាយប្រើយហាមាត់ម្ហុបៗ: "បាទមែនហើយអត់មានអត់មានទេមែនហើយ!"។ ម្ចាស់ផ្ទះបែរមកសម្លឹងកាព្រឹមដោយបន្ធូរកំហឹង: "មានតែបងឯងជាអ្នកទំលាយទ្វារចូលមែនទេ?" កាព្រឹមហាមាត់ច្រវាបៗនិយាយមិនចេញ ។ ម្ចាស់ផ្ទះយល់ចិត្តក៏និយាយដោយសំរួល: "បងឯងដឹងទេការទំលាយទ្វារ ការប្រើពាក្យគ្រោតគ្រាតរបស់បងឯងដោយមើលងាយកិត្តិយសខ្ញុំអំបាញ់មិញ អាចធ្វើឱ្យបងឯងជាប់គុកបានណាំ ប្រសិនបើខ្ញុំប្ដឹងបងឯងមើលមើល៍ការប្រច័ណ្ឌរបស់បងឯងសមឬទេ? មនុស្សនៅក្នុងភូមិគ្រឹះយ៉ាងណើងៗ **តទៅទំព័រទី ១៧**

តមកពីទំព័រទី ១២

# សារព័ត៌មានខ្មែរប៉ុស្តិ៍ ស.រ.អា...

របស់ខ្មែរដូចសព្វថ្ងៃនេះ គឺគ្រប់គ្រងតាមរូបមន្តនៃអ្នកប្រាជ្ញអ៊ីស្រាអែលចងក្រងទុកមកស្រាប់ ។

ការដោះស្រាយបញ្ហាវិបត្តិគ្រួសារខ្មែរនេះ ជាបញ្ហាមួយតូចទេ ដែលយើងយកមកដោះស្រាយមុន គេបានជោគជ័យ ហើយយើងនាំគ្នាដោះស្រាយបញ្ហាបន្ទាប់មកទៀតដូចជា:

**១**-ខ្មែរនៅហ្វីឡាមាន៣០,០០០នាក់ តែមិនអាចមានអាគារមួយសម្រាប់ឱ្យខ្មែរធ្វើពិធីជប់លៀង, អាពាហ៍ពិពាហ៍ ឬរាត្រីស្រមោលសរអី បានឡើយ ទោះបីបងប្អូនយើងមកតាំងទីលំនៅស្រុកនេះជាង៣០ឆ្នាំទៅ ហើយក៏ដោយ ។ សហគមន៍ខ្មែរយើងបានខាតបង់លុយប៉ុន្មានហើយ តែលើការជួលហាងគេក្នុងជាង៣០ឆ្នាំនេះ?

**២**-យើងមិនអាចមានផ្សារខ្មែរមួយធំលំដាប់ចិនយួននៅហ្វីឡានេះជា រឿងរហូតទៅឬ?

**៣**-អង្ករខ្មែរ, ស្ករត្នោត, ត្រីស្រស់, ត្រីងៀត, ប្រហុក, ត្រីឆ្អើរ ។ល។ ត្រូវតែបិទផ្លាកថាមកពីសៀមពីយួន អញ្ចឹងរហូតទៅឬ? តើមានបងប្អូន រួមឈាមណាមានគំនិតជួយដោះភាពអាម៉ាស់របស់ជាតិយើងនេះ ចោលចេញបានទេ? បើដោះបានយើងជួយបងប្អូន យើងបានច្រើនណាស់ពីការគៀបទម្លាក់ថ្លៃដោយគ្មានអាណិតអាសូរពីឈ្មួញ បរទេសទាំងនោះ ។ ទោះទម្លាក់ថ្លៃ ហើយឱ្យតែគេទិញក៏សុខចិត្តដែរ ព្រោះត្រូវការលុយសងការ ខ្ចីបុលគេធ្វើដើមទុន ។ អង្ករ, ស្រូវ, តម្លូងមី, សណ្តែក, គ្រាប់ស្វាយចន្ទី, កៅស៊ូក្រែប ។ល។ ត្រូវប្រឈមមុខនឹងបញ្ហាផលិតថ្លៃបានផលលក់ថោកនេះ ។ សូមបងប្អូនខ្មែរនៅលើទ្វីបទាំង៥ មេត្តារកមធ្យោបាយជួយប្រជារាស្ត្រខ្មែរក្រីក្រ ចេញឱ្យរួចពីការជិះជាន់ពីឈ្មួញបរទេសសិនទៅកុំឱ្យគេថា បញ្ញវ័ន្តខ្មែររៀនចេះបានតែស៊ីញ៉េ ទោះរៀនដល់ថ្នាក់ធំប៉ុណ្ណា ក៏ដោយ ធំខ្លាំងស៊ីញ៉េកាន់តែមហាធំកាន់តែអស់ដី អស់ទឹកអស់ព្រៃព្រឹក្សា ។



សកម្មភាពក្រុមគាំទ្រគ្រួសារខ្មែរប៉ុស្តិ៍



លើកកាសែតខ្មែរប៉ុស្តិ៍បុណ្យអុំទូកនៅឡូវែល

ដូចពោលមកពីខាងដើម សារព័ត៌មានខ្មែរផូសត៍សហរដ្ឋអាមេរិកមាន ទស្សនៈវិស័យបែបនេះ ហើយដំណើរពីលេខ១មកលេខ១០០នេះ គឺអស់ រយៈពេល៥ឆ្នាំហើយ យើងខ្ញុំខំបន្តស្រាវជ្រាវរកបងប្អូនឱ្យបានកាន់តែច្រើន ដើម្បីរួមគ្នារិះរកមធ្យោបាយជួយអូសទាញគ្នា ឱ្យផុតពីក្តីទុក្ខវេទនា ដោយសារវិបត្តិផ្សេងៗ, ពីអវិជ្ជាពីសេដ្ឋកិច្ចគ្រួសារទន់ទាប, ពីការដែលព្រងើយកន្តើយក្នុងការសិក្សារបស់កូនចៅយើងទាំងអស់គ្នា ។ មានតែសាមគ្គីរួបរួមគ្នាជាកម្លាំងនេះហើយដែលយើងអាចដោះស្រាយកិច្ចការធំៗបានជាសមូហភាព ។

ចូរកុំរស់តែឯកឯងទៀតចាប់ពីពេលនេះទៅហើយ ខំកំទេចចោលនូវ គំនិតនិយម "អញ" ចោលចេញ ដើម្បីអនាគតខ្មែរមានរស្មី ភ្លឺចញ្ចាចព្រោងព្រាតឡើង ។ សូមខំធ្វើឱ្យសហគមន៍ខ្មែរហ្វីឡាជាចំណុចចាប់ផ្តើមនៃ ជោគជ័យ ដើម្បីឱ្យបានជាចន្លុះដំបូងបំភ្លឺឱ្យបងប្អូនខ្មែរគ្រប់ទិសទីក្រោក ឈរឡើងគ្រវីទង់ជោគជ័យបន្តបន្ទាប់គ្នាកុំបីខានឡើយ ។

បើសហគមន៍ខ្មែរនៅបរទេសរីកចំរើនធំធាត់ ទើបមានសង្ឃឹមជួយ ដល់មាតុភូមិយើងបាន ។ បើយើងនៅតែក្នុងភាពជួយខ្លួនឯងពុំចង់រួចផង តើសង្ឃឹមទៅលើអី ដើម្បីជួយរំដោះមាតុភូមិយើង? ៕




# PHARMACY

RITE PRICE . RITE ADVICE . WE CARE






## សូមស្វាគមន៍

ក្នុងនាមជាឱសថការីខ្ញុំ ដាន់ ថាច់ មានសេចក្ដីរីករាយ និងបំរើបងប្អូនក្នុងសហគមន៍ឲ្យមានសុខភាពល្អ មាំមួន គ្រប់ៗគ្នា

- ផ្ញើថ្នាំជូនដល់ផ្ទះដោយឥតគិតថ្លៃ
- ទទួលអ៊ិនសួរិនស្ទើរគ្រប់មុខ
- ទទួលបន្តផ្ដល់ថ្នាំដែលលោកអ្នកកំពុងប្រើទិញមកពីឱសថស្ថានផ្សេងៗ
- តម្លៃថោកៗបំផុត និងមានស្តុកឱសថគ្រប់មុខប្រភេទ
- ផ្ដល់សេវាដោយរហ័សទាន់ចិត្ត
- មានឱសថវីតាមីន-ឱសថចិនសែ និងឧបករណ៍ព្យាបាលមុខជំងឺ

**1337 W.Rockland St.Philadelphia, PA 19141**
**(corner of Old York Rd & Rockland St.)**
**Tel: 267-297-5879 Fax: 267-297-5880**



# ហាងមាសរស្មី

## SUNSHINE JEWELRY, INC.

**215-271-2950**

Certified Diamonds & Golds (24K & 18K)
Men & Women Jewelries & Watches
Custom Design & Repairs on Premise
15 Years in Services & Growing Strong










702 Washington Ave. Phila., PA 19147
www.sunshinejewelryonline.com



# Insurance-Income Tax Mortgage-Realty

ធានារ៉ាប់រង_តាក់លើប្រាក់ចំណូល_ខ្ចីប្រាក់ទិញផ្ទះ_ទិញលក់ផ្ទះ

**Insurance** ធានារ៉ាប់រង
(Licensed PA, NJ & DE) អាជ្ញាប័ណ្ណ PA, NJ & DE
Home • ផ្ទះ Car • រថយន្ត
Business • មុខរបរ Health • សុខភាព

**Income Tax** តាក់លើប្រាក់ចំណូល
Individual • ផ្ទាល់ខ្លួន Business • ពីមុខរបរ
Pay Roll • ពីប្រាក់ខែ
Forming New Business • បង្កើតមុខជំនួញថ្មី
Home Deed Transfer • ប្ដូរឈ្មោះផ្ទះ
Auto Title Transfer • ប្ដូរឈ្មោះម្ចាស់រថយន្ត




**Vihi Mortgage Vihi ខ្ចីប្រាក់ទិញផ្ទះ**

(Licensed by PA Dept. of Banking)
Hiep Vo, MBA, President.
Finance/Refinance your home
Low interest Rate & Down Payment
Fast Preapproval

- អាជ្ញាប័ណ្ណពី PA ការិយាល័យធានាគារ
- ហៀប វ៉ូ MBA ប្រធាន
- ផ្ដល់ប្រាក់កម្ចីក្នុងការទិញផ្ទះទិញដំបូង ឬកណ្ដាលទី
- ការប្រាក់ថោក និងលុយកក់តិច
- ចម្លើយលឿន

Vihi Realty Co
Dr. Hanh Vo, Broker/Owner Cell (267) 664-2689
Buy & Sell Properties & Businesses
Visit: www.drhanh.net for more foreclosure homes

North Phila – 215-276-8441
5225 N. 5th Street
Phila., Pa 19120

South Phila – 215-336-0600
1519 W. Passyunk Ave.
Phila., Pa 19145
www.vihifinancial.com

# Yoo's Auto Service and Collision

## យូ បំរើសេវារថយន្ត

នឹងរថយន្តគ្រោះថ្នាក់ប៉ះទង្គិច



**FREE ESTIMATES**

យើងអាចជួសជុលរថយន្តដ៏មានតម្លៃរបស់លោកអ្នកឱ្យបានប្រសើរបំផុត ដើម្បីសុវត្ថិភាពលោកអ្នកមិនឱ្យខុសចិត្តឡើយ ។

**រោងជាងម៉ាស៊ីន**

Check Engine Light Diagnostic
Electronic Wheel Alignment
Certified Enhanced Emission
Inspection & Repairs
Muffler & More

**រោងជួសជុលតួរថយន្ត**

Expert Body Work
Fender & Paint Work
Frame Straightening
Insurance Specialists




**189 W. Duncannon Ave. Phila., PA 19120**

**ទូរស័ព្ទរក SAM 215-457-7777 ឬ 215-457-7779, Fax-215-457-7475**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៧ ខែកុម្ភៈ ឆ្នាំ២០១២

# ក្រសួងសុខាភិបាលថា ការងារធ្វើរួចហើយប៉ុន្តែ ឱសថស្ថានក្រៅផ្លូវការនៅតែមានដដែល

**ឃួន ណារិម និង Darius Navidzadeh និងឡោ ច័ន្ទតារា**

**ខេមបូឌាដេលី**

ឈរនៅពីក្រោយទូរដាក់ថ្នាំដែលកញ្ចប់និងប្រអប់ថ្នាំបើក ចំហរត្រៀបត្រា លោក កែវ សុផល អ្នកលក់ ថ្នាំនៅឯផ្សារមួយ តាមផ្លូវក្នុងខេត្តនេះ បានផ្សំថ្នាំឱ្យអ្នកស្រុកតាមវេជ្ជបញ្ជាអស់ រយៈពេលជាច្រើនឆ្នាំមកហើយ ។

ប៉ុន្តែលោក សុផល មិនមែនជាឱសការីទេ ។ លោកពុំមាន អញ្ញាប័ណ្ណដែលមានឈ្មោះរបស់លោកឡើយ បើទោះជារដ្ឋាភិ បាលបានកំណត់ថា ឱសថស្ថានទាំងឡាយត្រូវតែមានច្បាស់អនុ - ញ្ញាតជាផ្លូវការដែលចេញដោយក្រសួងសុខាភិបាលក៏ដោយ ។

លោក សុផល បាននិយាយនៅឯតូចលក់ថ្នាំរបស់ខ្លួនក្នុង សប្តាហ៍នេះថា "វាមិនមែនជាឱសថស្ថានទេ ប៉ុន្តែខ្ញុំនៅតែអាច លក់ឱសថបាន ។ ខ្ញុំដឹងថា ការលក់ថ្នាំគ្មានការអនុញ្ញាណឱ្យបើក ឱសថស្ថានគឺជារឿងខុសច្បាប់ ។ ប៉ុន្តែយើងលក់ថ្នាំឱ្យប្រជាជន ដើម្បីចិញ្ចឹមគ្រួសារប៉ុណ្ណោះ "។

ពុំមានតួរលេខពិតប្រាកនៃឱសថស្ថានខុសច្បាប់ទូរទាំងប្រ ទេសទេ ប៉ុន្តែរាជរដ្ឋាភិបាលបានលើកឡើងថា នេះគឺជារឿងចាស់ ។

ក្នុងឱកាសចាប់ផ្តើមយុទ្ធនាការប្រឆាំងគ្រឿងញៀននៅ ស្ថានទូតអាមេរិកក្នុងក្រុងភ្នំពេញ កាលពីថ្ងៃច័ន្ទនេះ លោក ជូន យិនស៊ីន រដ្ឋលេខាធិការក្រសួងសុខាភិបាលបានថ្លែងថា បច្ចុប្បន្ន នេះពុំមានឱសថស្ថាន ឬគ្លីនិកពិនិត្យសុខភាពខុសច្បាប់ក្នុងប្រ ទេសកម្ពុជាទេ។

លោកបានថ្លែងតាមសុន្ទរកថា មួយថា "ពីមុនធ្លាប់មានឱ- សថស្ថានខុសច្បាប់នៅកម្ពុជាដែរ ប៉ុន្តែពេលនេះគ្មានទៀតទេ គ្លីនិកខុសច្បាប់ក៏លែងមានទៀតដែរ ។

នៅឯតូចលក់ថ្នាំរបស់លោក សុផល ដែលធ្វើពីឈើនិងប្រក់ ស័ង្កសីលោកបានបង្ហាញវិញ្ញាបនបត្រ ដែលមានរូបថតកូនប្រុស របស់ខ្លួនជាគ្រូពេទ្យធ្វើការនៅភ្នំពេញ ។ លោកបានពន្យល់ថា កូនរបស់គាត់ទទួលបានអជ្ញាប័ណ្ណពីមន្ទីរសុខាភិបាលខេត្តកំពង់ ស្ពឺ ដូច្នេះគាត់អាចប្រកបរបរនេះបាន ។

នៅឯតូចមួយទៀតនៅតាមផ្លូវជាតិលេខ៣បុរសឈ្មោះ ហេង បូរ៉ា ដែលទទួលបានការបណ្តុះបណ្តាលជាគ្រូពេទ្យយោធា និងដែលមានគ្លីនិកពិនិត្យសុខភាពឯកជនតូចមួយ នៅក្បែរតូច នោះមានលក់ឱសថមួយចំនួនដូចជា ថ្នាំគ្រុនចាញ់និងថ្នាំផ្សះជាដើម ។

លោកបូរ៉ា បាននិយាយថា "ការលក់ឱសថទាំងនេះគឺជា រឿងខុសច្បាប់ពីព្រោះកន្លែងនេះមិនមែនជាឱសថស្ថានទេ ក្រុម មន្ត្រីសុខាភិបាលធ្លាប់បានចុះមកត្រួតពិនិត្យដែរ ប៉ុន្តែពួកគេយល់ ថា យើងអាចលក់ឱសថបានព្រោះយើងមានគ្លីនិកពិនិត្យជំងឺ មួយដែរ ។ វាគ្រាន់តែឱសថមួយចំនួនតូចប៉ុណ្ណោះ "។

លោក យិនស៊ីន នៃក្រសួងសុខាភិបាលបានបដិសេធមិនធ្វើ អត្ថាធិប្បាយអំពីការបន្តមានឱសថស្ថានមិនស្របច្បាប់បែបនេះទេ ។

ចាប់តាំងពីឆ្នាំ២០០៥មកក្រសួងសុខាភិបាលបានខិតខំប្រឹង ប្រែងបិទឱសថស្ថានខុសច្បាប់នៅកម្ពុជាតាមរយៈការធ្វើអធិកា កិច្ចនៅទូរទាំងប្រទេស ។

យោងតាមរបាយការណ៍មួយដែលចេញផ្សាយកាលពីឆ្នាំ មុនដោយគណៈកម្មាធិការអន្តរក្រសួង ដើម្បីលុបបំបាត់ឱសថក្លែង ក្លាយ និងសេវាគាំពារសុខភាពខុសច្បាប់បានឱ្យដឹងថា ចំនួនឱសថ ស្ថានខុសច្បាប់បានធ្លាក់ចុះពីជា១ពាន់កន្លែងនៅក្នុងឆ្នាំ២០០៩ មកនៅត្រឹមតែ១០កន្លែងប៉ុណ្ណោះនៅក្នុងឆ្នាំ២០១១។

ប៉ុន្តែក្រុមអ្នកជំនាញខាងសុខាភិបាលបាននិយាយថា នៅមិនទាន់ប្រាកដថាឱសថស្ថានខុសច្បាស់ត្រូវបានបំបាត់ ចោលទាំងស្រុងហើយទេ ។

លោក Gunther Hintz នាយកអង្គការ Medicorps ដែលជាអង្គការស្ម័គ្រចិត្តអន្តរជាតិបានថ្លែងថា បុគ្គលិកធ្វើការ នៅតាមឱសថស្ថានខុសច្បាប់ ជារឿយៗកំណត់រោគសញ្ញាខុសហើយ ផ្សំថ្នាំមិនត្រឹមត្រូវឱ្យអ្នកជំងឺឡើយ ។

លោកបានថ្លែងថា "វាជាបញ្ហាដ៏ធំមួយប្រសិនបើនៅតែមាន ឱសថស្ថានខុសច្បាប់តទៅទៀតនោះ ។ ពួកគេលក់ថ្នាំផ្សះ មិនរើប្រភេទឱ្យអ្នកជំងឺហើយមិនដឹងពីរបៀបប្រើថ្នាំទេ ។ ប្រជាពលរដ្ឋទៅឱសថស្ថាន ដើម្បីចៀសវាងការបង់ប្រាក់ឱ្យ ទៅវេជ្ជបណ្ឌិតនេះគឺជាបញ្ហាសុខភាពដ៏ធំមួយ" ។

លោកបានថ្លែងទៀតថា អ្នកលក់បែបនេះច្រើនតែទទួល បានអាជ្ញាប័ណ្ណដោយមិនស្របច្បាប់ទេ ហើយនាំគ្នាដាក់តាំងវា ដើម្បីធ្វើការលក់ដូររបស់ខ្លួនមានភាពស្របច្បាប់ ។

បានមានប្រសាសន៍ថា "ការចេញវិញ្ញាបនបត្រ និងអាជ្ញាប័ណ្ណ ឱ្យឱសថស្ថាននានាគ្មានន័យអ្វីឡើយ ប្រសិនបើគ្មានយន្តការ ត្រួតពិនិត្យ និងការពង្រឹងការគ្រប់គ្រងនោះ" ។

បញ្ហាមួយទៀត គឺថាពួកគេច្រើនតែលក់ឱសថក្លែងក្លាយ ។ ទោះជាយ៉ាងណាលោក យិនស៊ីន បានថ្លែងថាឱសថក្លែងក្លាយ មានចំនួនស្មើរនឹង០.២ភាគរយឱសថទាំងអស់ដែលមានដាក់ លក់នៅលើទីផ្សារនាពេលបច្ចុប្បន្នប៉ុណ្ណោះ ។

ប៉ុន្តែលោក សិនសុម្មុនី នាយកប្រតិបត្តិអង្គការ MEDICAM ដែលសម្ព័ន្ធអង្គការក្រៅរដ្ឋាភិបាលផ្នែកសុខាភិបាលបានថ្លែង ថា កម្ពុជានៅខ្វះក្របខ័ណ្ឌច្បាប់ ដើម្បីធានាថាឱសថស្ថានទាំង ឡាយនៅប្រទេសបំពេញបានតាមនិយាមអន្តរជាតិ ។

លោកបានថ្លែងថា "ខ្ញុំមិនជឿថាគ្លីនិកខុសច្បាប់ និងឱសថ ស្ថានគ្មានអាជ្ញាប័ណ្ណត្រូវបានលុបបំបាត់ទាំងស្រុងហើយនោះ ទេ ប៉ុន្តែខ្ញុំពិតជាកោតសរសើរកិច្ចខិតខំប្រឹងប្រែងរបស់ក្រសួង សុខាភិបាលណាស់ ។ វាបង្ហាញឱ្យឃើញពីការកែលំអរជាច្រើន ប៉ុន្តែនៅមានការងារជាច្រើនទៀតដែលត្រូវធ្វើ" ៕

ប្រែសម្រួលដោយ : ស៊ុំ សុខគុំ

## Informal Pharmacies Continue To Operate Despite Crackdown

**By Darius Navidzadeh And Lor Chandara**

THE CAMBODIA DAILY

Baset District, Kompong Speu province - Stading behind a counter littered with open medicine boxed and tablet sachets, Keo Sophal, a vendor at a roadside market here, has been selling prescription drugs to local residents for years.

But Mr. Sophal is no pharmacist. Nor does he have a license bearing his name, despite government rules that dictate all pharmacies must display an official permit issued by the Health Ministry.

"This is not a pharmacy, but I sell medicine anyway. I know it is unlawful that we sell drugs without a permit to run a pharmacy. But we sell medicine to people to support family," Mr. Sophal said from his stall this week.

There are no reliable figures on the number of illegal pharmacies operating nationwide, but the government insists that the problem is a thing of the past.

At the launch of an anti-drug campaign at the US Embassy in Phnom Penh on Monday, Chou Yim Sim, secretary of state at the Ministry of Health, said there were no illegal pharmacies or health clinics currently doing business in the country.

"In Cambodia, previously we had illegal pharmacies, but now there are no illegal pharmacies anymore. The same applies to illegal clinics," he said in a speech.

At Mr. Sophal´s makeshift pharmacy made from wood and corrugated iron, he presented a laminated certificate bearing a picture of his son, a physician working in Phnom Penh.

He explained that his son had attained the license from the provincial health department in Kompong Speu so he could open his business.

At another makeshift hut on National Road 3, Heng Bora, who was trained as a physician in the army, sells medicine such as anti-malaria pills and antibiotics, and also runs a small private health clinic nearby.

"It is illegal to sell drugs because this is not a pharmacy. Health officials used to come and inspect, but they understand we can have medicine to sell along with having an outpatient clinic. It´s just a small amount of medicine," Mr. Bora said.

Mr. Yin Sim at the Health Ministry declined to comment on the continued existence of the informal pharmacies.

Since 2005, the Ministry of Health has made strong efforts to shut down illegally operating pharmacies in Cambodia by conducting inspections nationwide.

According to a report released last year by the Inter-Ministerial Committee for Eliminating Counterfeit Drugs and Illegal Health Care Services, the number of illegal pharmacies fell from more than 1,000 in 2009 to only 10 in 2011.

But health experts said it was doubtful that illegal pharmacies had been eradicated.

Gundther Hintz, president of Medicorps, an international volunteer organization, said that workers at illegal pharmacies can often misdiagnose and improperly prescribe medication to patients.

"It´s a big problem if there are still illegal pharmacies around," he said. "They will sell you any type of antibiotics or anything and don´t know how to apply their medication. The population goes to pharmacies to avoid paying doctor´s fees, which is a huge health problem."

Mr. Hintz said vendor often obtain licenses illegitimately, and display them to authenticate their business.

"Certification and licensing of pharmacies is meaningless if there are no mechanisms for checking and enforcing regulations. Any untrained vendor can display a certificate of supervision by a licensed pharmacist or physician without ever having that person present," he said.

Another problem is that pharmacies often sell counterfeit drugs. However, Mr. Yin Sim said that counterfeit drugs represented just 0.2 percent of all drugs currently being sold on the market.

Still, Sin Somuny, executive director of MediCam an umbrella group of health NGOs said there is minimal regulatory framework to ensure that pharmacies in the country meet international standards.

"I doubt that illegal clinics and unlicensed pharmacies have been fully eliminated in the country," said Mr. Somuny. "I do appreciate the effort of the Ministry of Health. It has shown a lot of good improvements, but there is still a lot more work to be done."

តមកពីទំព័រទី ១៣ **អ្នកប្រចណ្ឌប្តីជាប់...**

ទៅលបលួចសាហាយស្មន់ជា មួយប្តីបងឯងដែលមកសុំឱ្យខ្ញុំអាណិត ឱ្យការងារអី ធ្វើគ្រាន់គ្រាន់បានលុយចិញ្ចឹមកូនប្រពន្ធ? ដំបូងខ្ញុំមិនចង់ស្តាប់ពាក្យអង្វររបស់គាត់ទេ តែឮថា ទើបអស់ការងារធ្វើស្រួលមិនស្រួលអត់បាយទាំង៣នាក់ ម៉ែ!កូន... ខ្ញុំរន្ធត់ចិត្តក៏ព្រមឱ្យមកជួយការងារផ្ទះទាំងគ្មានការដឹងឮពីប្តីខ្ញុំផង ព្រោះគាត់ត្រូវទៅបំពេញបេសកកម្មនៅខេត្ត ដោយរកឈ្នួល ស្រីមកជំនួសមួយមុនមិនទាន់ ។ តែយើងជាស្រីដូចគ្នាមានរឿងលំបាកច្រើនណាស់ បើប្តីបោះបង់ចោលយើង ។ ខ្ញុំមិនប្តឹងបងឯងឱ្យសងជំងឺចិត្តនឹងកិត្តិយសខ្ញុំទេ តែសុំបងឯងនាំប្តីទៅផ្ទះចុះកុំឱ្យរញ៉ីរញ៉ៃមានរឿងប្លែះប្លាស់អញ្ចឹងទៀត ។ នាយប្រុញ ធ្វើមុខស្មឿកអស់សង្ឃឹមសម្លឹងមុខចៅហ្វាយស្រី: "លោកស្រីឈប់ឱ្យខ្ញុំធ្វើការរហូត?"។ -ពូឯងនាំប្រពន្ធទៅផ្ទះសិនទៅ ហើយនិយាយគ្នា ឱ្យច្បាស់លាស់ បើប្រពន្ធពូឯងអនុញ្ញាតឱ្យមកស្រួលបួលចាំមក បើស្អែកពូមិនអាចមកបាន ខ្ញុំនឹងរកមនុស្សផ្សេង ។ ឮតែប៉ុណ្ណឹងនាយប្រុញឆ្លើយបាទៗ រត់ទៅយកកង់នៅក្រោយផ្ទះកាព្រឹមកន្ទ្រាក់ បានកូនរត់តាមក្រោយទៅជិះពីក្រោយប្តីបីកូន ធ្វើព្រងើយភ្លេចយួរកន្ត្រកកន្ទបនឹងទឹកដោះគោរបស់កូន ។ ពូប្រើយស្ទុះយកបានកន្ត្រករត់តាម ក្រោយស្រែកហៅ: "នែនាងម៉េចមិនយកកន្ត្រកអី វ៉ាន់អាអូនតូចទៅផងហើយនែ! ឯណាលុយឈ្នួល កង់ឱប?"។ -ពូយកកន្ត្រកនោះមកផ្ទះឱ្យខ្ញុំផង ឯលុយប្រញាប់អី ឱ្យខ្ញុំជំពាក់សិនទៅចាំបងប្រុញធ្វើការបានលុយចាំខ្ញុំសងបណ្តើរៗ ប្រញាប់អីម្លេះ ពូប្រើយ! លាទៅមុនហើយ!!។ នាយប្រើយធ្វើ មុខជូរ: "យ៉ាប់មែនម៉ាព្រឹករកម៉ូយម្នាក់មិនបានដល់បានចំលើអាម៉ូយស្អុយតែម្តង សួយអីសួយម្លេះទេ ព្រះអើយ!"៕



# លិខិតក្រសួងអប់រំក្រុងហ្វីឡា ដែលផ្ញើជូនឪពុកម្តាយសិស្ស

**ខែកុម្ភៈ ទី២៨**

ជូនចំពោះ មាតាបិតា/អាណាព្យាបាល

ដូចលោកអ្នកបានជ្រាបរួចមកហើយថា ដោយសារមានការខ្វះខាតថវិការឆ្នាំនេះក្រសួងអប់រំនឹងផ្តល់កម្មវិធីសិក្សានៅរដូវក្តៅដោយមានកំណត់ ហើយនឹងមិនផ្តល់កម្មវិធីសិក្សានៅរដូវក្តៅទូទាំងក្រសួងទេ។ លិខិតនេះគឺផ្តល់ជូនលោកអ្នកនូវព័តិមានបន្ថែមដែលទាក់ទងនឹងកម្មវិធីសិក្សានៅរដូវក្តៅរបស់ក្រសួងសម្រាប់ឆ្នាំ២០១២ និងផ្តល់ជូនលោកអ្នកនូវសេចក្តីបញ្ជាក់អំពីឱកាសផ្សេងៗនៅរដូវក្តៅសម្រាប់កូនលោកអ្នក ។

នៅរដូវក្តៅនេះក្រសួងអប់រំនឹងផ្តល់កម្មវិធីសិក្សានៅរដូវក្តៅដូចតទៅ :

១- បន្ថែមថ្ងៃសិក្សាប្រចាំឆ្នាំ/ <u>Extended School Year :</u> ការបន្ថែមថ្ងៃសិក្សាប្រឆ្នាំ (ESY) នឹងមាន សម្រាប់សិស្ស ដែលរៀនក្នុងកម្មវិធីគម្រោងការណ៍សិក្សាសម្រាប់សិស្សម្នាក់ៗ ( IEPs) ដែលបញ្ជាក់ថា ពួកគេមានសិទ្ធចូលរួមក្នុងកម្មវិធី ESY។ ការិយាល័យផ្តល់ជំនួយពិសេស នឹងជម្រាបទៅមាតាបិតារបស់សិស្សដែលមានសិទ្ធចូលរួមតាមរយៈលិខិត ។ ដើម្បីជ្រាបព័តិមានបន្ថែមមាតាបិតា ឬអាណាព្យាបាលអាចទូរស័ព្ទមកលេខ ២១៥-៤០០-៦៦៥៥ ។

២- កម្មវិធីរៀនបន្ថែមនៅរដូវក្តៅ / Summer Bridge Program: វិទ្យាល័យរបស់យើងមួយចំនួននឹងផ្តល់កម្ម វិធីរៀនបន្ថែមនៅរដូវក្តៅសម្រាប់សិស្សានុសិស្សដែលនឹងឡើងថ្នាក់ទី៩។ បើសិនជាកូនលោកអ្នកដែលរៀននៅថ្នាក់ទី៨ អាចមានសិទ្ធចូលរៀនក្នុងកម្មវិធីរៀនបន្ថែមណាមួយ លោកអ្នកនឹងទទួលដំណឹងពីសាលាផ្ទាល់មិនហួសពីពាក់កណ្តាលខែមីនា ។ ដើម្បីជ្រាបបញ្ជីឈ្មោះវិទ្យាល័យដែលចូលរួមក្នុងកម្មវិធីនេះ សូមមើលវ៉ិបសាយរបស់ស្រួង ឬទូរស័ព្ទទៅលេខ ២១៥-៤០០-៤០០០ ។

៣- កម្មវិធីរៀនយកពិន្ទុបង្គ្រប់ សម្រាប់សិស្សវិទ្យាល័យ / High School Credit Recovery Program: សិស្សវិទ្យាល័យថ្នាក់បញ្ចប់ណាដែលត្រូវការមួយ ឬពីរពិន្ទុ ដើម្បីបង្គ្រប់ពិន្ទុបញ្ចប់ការសិក្សា នឹងមានឱកាសចូលរៀននៅមណ្ឌលសិស្សវិទ្យល័យថ្នាក់បញ្ចប់ (Senior Center) ស្ថិតនៅវិទ្យាល័យ Ben Franklin។ បើសិនជាកូនរបស់ លោកអ្នកមានសិទ្ធចូលរួមក្នុងកម្មវិធីរៀនយកពិន្ទុបង្គ្រប់សម្រាប់សិស្សវិទ្យាល័យ លោកអ្នកនឹងទទួលដំណឹងពីសាលរបស់កូនលោកអ្នកនៅខែឧសភា ។ ដើម្បីជ្រាបព័តិមានបន្ថែម លោកអ្នកអាចទូរស័ព្ទទៅកាន់លេខ ២១៥-៤០០-៤០០០ ។

យើងខ្ញុំក៏ចង់ឱ្យលោកអ្នកជ្រាបអំពីកម្មវិធីនៅរដូវក្តៅ និងឱកាសផ្សេងៗជាច្រើនទៀត ដែលមាននៅក្នុងសហគមន៍របស់លោកអ្នកដែរ។ តាមការសហការរបស់យើងជាមួយទីក្រុងហ្វីឡាដែលហ្សា៉កម្មវិធីនៅរដូវក្តៅនឹងមាននៅតាមសាលារបស់យើងជាច្រើន។ ព័តិមានអំពីទីកន្លែងសម្រាប់កម្មវិធីនៅរដូវក្តៅនឹងចាត់ចែងដោយក្រុម Afterschool Activities Partnerships ហើយមាតាបិតានិងអាណាព្យាបាលគួរទាក់ទងទៅទីកន្លែងដែលផ្តល់កម្មវិធី ឈ្មោះកម្មវិធីនេះសូមមើលវេបសាយ www.phillyasap.org ឬទូរស័ព្ទ លេខ២១៥-៥៤៥-២៧២៧។

បណ្តាញ Southeast Region PA 2-1-1 ក៏មានបញ្ជីឈ្មោះកម្មវិធីនិងការបម្រើទាំងអស់សម្រាប់ ក្មេង យុវវ័យ និងក្រុមគ្រួសារដែរ ។ គេជំរុញឱ្យមាតាបិតា និងអាណាព្យាបាលទៅមើលកន្លែងដើម្បីជ្រើសរើសកម្មវិធីនៅក្នុងសហគមន៍របស់ខ្លួន និងទាក់ទងទៅអង្គការទាំងនោះ ដោយផ្ទាល់អំពីសកម្មភាពផ្សេងៗរបស់ពួកគេនៅរដូវក្តៅ ។ មិនយូរប៉ុន្មាន PA 2-1-1 និងមានទំព័រព័តិមានសំខាន់ៗព្រមទាំងបណ្តាញតភ្ជាប់(Links)និងព័តិមានជាក់លាក់សម្រាប់កម្មវិធីនិងសកម្មភាពផ្សេងៗនៅរដូវក្តៅ ។ ដើម្បីជ្រាបព័តិមានបន្ថែមសូមមើលវេបសាយ www.211 sepa.org ឬទូរស័ព្ទទៅលេខ ២១១ ឬ ១-៨៦៦-៩៦៤-៧៩២២។

នៅទីបញ្ចប់មិនយូរប៉ុន្មានវេបសាយរបស់ទីក្រុងហ្វីឡាដែលហ្សា៉ (www.phila.gov) នឹងមានបណ្តាញតភ្ជាប់ (Links)ទៅនឹងព័តិមានសំខាន់ៗអំពីកម្មវិធីនៅរដូវក្តៅជាច្រើន។ លោកអ្នកអាចស្វែងរកកម្មវិធីផ្សេងៗតាមប្រភេទ នៃកម្មវិធី(type)ឬតាមលេខតំបន់(Zipcode) ។មាតា បិតា និងអាណាព្យាបាលគួរទៅមើលកន្លែងទាំងនោះដោយផ្ទាល់ ដើម្បីស្វែងយល់ឱ្យដឹងថា គេផ្តល់កម្មវិធីអ្វីខ្លះនៅរដូវក្តៅនេះ ។

ព័តិមានដែលមាននៅក្នុងវេបសាយទាំងអស់ខាងលើនេះ មានព័តិមានថ្មីៗទាន់ពេលវេលា ដូចនេះ យើងខ្ញុំសូមឱ្យលោកអ្នកមើលឱ្យបានញឹកញាប់ ។ ដើម្បីជាការងាយស្រួលដល់លោកអ្នកបណ្តាញតភ្ជាប់ទាំងនេះ និងមាននៅក្នុងវេបសាយរបស់ក្រសួងអប់រំ ។ សូមផ្សព្វផ្សាយព័តិមានដល់មិត្តភក្តិសមាជិកគ្រួសារនិងអ្នកជិតខាងនៅក្នុងសហគមន៍របស់លោកអ្នក ។

ទោះជាក្រសួងអប់រំមិនផ្តល់កម្មវិធីនៅរដូវក្តៅច្រើន ដូចដែលយើងធ្លាប់មានជាច្រើនឆ្នាំ កន្លងមកនេះក៏ដោយក៏ទីក្រុងហ្វីឡាដែលហ្សា៉ និងបណ្តាញអង្គការដ៏រឹងមាំក្នុងសហគមន៍ និងផ្តល់ឱកាសដែលមានតម្លៃ និងប្លែកៗសម្រាប់សកម្មភាពដែលមានសុវត្ថិភាព និងមានការរៀបចំ ដើម្បីបង្កើតចំណេះដឹងបន្ថែមទៀត ។ យើងខ្ញុំចង់ឱ្យលោកអ្នកចាប់ផ្តើមរៀបចំគម្រោងការណ៍ ចាប់ពីឥឡូវនេះទៅដោយសារកម្មវិធីទាំងនេះទទួលសិស្សតាមលំដាប់នៃការមកចុះឈ្មោះ ។

សូមអរគុណចំពោះពេលវេលាការយកចិត្តទុកដាក់ និងការសហការយ៉ាងជិតស្និទ្ធរបស់ លោកដោយសេចក្តីស្មោះស្ម័គ្រ

Penny Nixon

សហអគ្គនាយិកា ផ្នែកសាលារៀននិងកម្មវិធីសិក្សា

នាទី ប្រវត្តិសាស្ត្រ

# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : គីម វិមល**

**ឧសភា :** លោក សឹង សាន ប្រធានរណសិរ្ស ស្នើឱ្យខ្មែរនៅក្រៅប្រទេសមានសិទ្ធិបោះឆ្នោត រាប់ទាំងខ្មែររស់នៅវៀតណាម (ខ្មែរក្រោម) ហើយ ជំទាស់នឹងជនវៀតណាមដែលកើតនៅកម្ពុជា ឬមានឪពុកម្ដាយកើតនៅកម្ពុជា លោកចោទប្រទេសវៀតណាមថា បានយកកម្ពុជាជារណបតាមរយៈសហគមន៍យួនដែលមកឈរជើងនៅកម្ពុជា លោកបានស្នើឱ្យបណ្ដេញសហគមន៍យួនទាំងនោះចេញពីកម្ពុជា។

**១២ ឧសភា :** ទ្រង់រណឫទ្ធិ ប្រធានហ្វ៊ុនស៊ិនប៉ិច ប្រកាសថា មានទាហ៊ានយួន៤ម៉ឺននាក់ និងនិគមយួន១លាននាក់នៅក្នុងដែនដីកម្ពុជា។

**១៤ ឧសភា :** ដំណើរធម្មយាត្រាពីព្រំប្រទល់ដែលថៃបានមកដល់ភ្នំពេញ មានអ្នកដំណើរ៦០០នាក់ដឹកនាំដោយព្រះមហាឃោសនន្ទ ។ ចំនួនជនភៀសសឹកចាប់តាំងពី១៩៨៩ បានឡើងដល់២០ម៉ឺននាក់។

**១៥ ឧសភា :** ក្រុងកំពង់សោម បានក្លាយជាថ្មីទៅជាក្រុងព្រះសីហនុ នៅពេលសម្ដេចសីហនុទៅធ្វើទស្សនៈកិច្ចនៅទីនោះ។

**២១ ឧសភា :** រណសិរ្សរំដោះជាតិកម្ពុជាធ្វើមហាសន្និបាទរបស់ខ្លួន នៅកីឡាដ្ឋានអូឡាំពិកភ្នំពេញ ពេលនោះបានប្ដូររណសិរ្សទៅជាគណបក្សប្រជាធិបតេយ្យសេរីព្រះពុទ្ធសាសនា ការបែកចេញរបស់ឧត្ដមសេនីយ៍ សាក់ស៊ុតសាខន តាំងពីឆ្នាំ១៩៩០ បានត្រូវបង្ហាញច្បាស់នាពេលនោះ។

**២៨ ឧសភា :** អាកាស៊ី ថ្លែងថា គ្មានភស្តុតាងណាថា មានទ័ពយៀកណាមនៅកម្ពុជាទៀតទេ ដែលផ្ទុយពីការប្រកាសជារឿយៗរបស់ក្រុមខ្មែរក្រហម ក្រុមខ្មែរក្រហមមិនព្រមធ្វើសហការណ៍ជាមួយអ៊ុនតាក់ ដើម្បីផ្ដល់ភស្តុតាងដែលថា ខ្លួនមាននោះទេ។

**៣០ ឧសភា :** ព្រឹត្តិការណ៍ "រនាំងឫស្សី១ដើម" ដែលអ្នកយាមខ្មែរក្រហមម្នាក់បានដាក់បាំងផ្លូវ បានរាំងដំណើរ អាកាស៊ី និងឧត្តមសេនីយ៍មេទ័ពអ៊ុនតាក់ សាន់ឌ័រសុន មិនឱ្យចូលប៉ៃលិនបាន ដោយគ្មានការអនុញ្ញាតពីក្រុមខ្មែរក្រហម រីឯរថយន្តទំនិញថៃវិញអាចចូលទៅបាន។

(មានតនៅលេខក្រោយ)

# បេសជននៃសម្ព័ន្ធអាក៉ាប់អង្គការសហប្រជាជាតិ នឹងទស្សនៈកិច្ចប្រទេសស៊ីរីក្នុងពេលឆាប់ៗនេះ

**ខេមបូឌាដេលី**

អង្គការសហប្រជាជាតិ លោក កូហ្វី អាណាន់ (Kofi Annan) ប្រេសិតនៃសម្ព័ន្ធអារ៉ាប់អង្គការសហប្រជាជាតិ ទទួលបន្ទុកកិច្ចការពាក់ព័ន្ធនឹងប្រទេសស៊ីរីបាននិយាយកាលពីថ្ងៃពុធថា លោករំពឹងថានឹងធ្វើទស្សនៈ-កិច្ចប្រទេសស៊ីរី ក្នុងពេលឆាប់ៗនេះ ហើយបានស្នើឱ្យប្រធាធិបតីស៊ីរី លោក បាសាអាល់ អាសាដ ចូលរួមក្នុងកិច្ចខិតខំប្រឹងប្រែងដើម្បីបញ្ចប់ភាពចលាចលដែលមានការបង្ហូរឈាមនៅក្នុងប្រទេសនេះ ក្នុងរយៈប៉ុន្មានទសវត្សរ៍កន្លងទៅនេះ ។

ពិភពខាងក្រៅគ្មានអំណាចបញ្ឈប់ការសម្លាប់នៅក្នុងប្រទេសស៊ីរីទេ ហើយការបង្ក្រាបលើការតវ៉ាដោយសន្តិវិធីពីដំបូងបានបង្កើតឱ្យមានការបោះបោរប្រដាប់អាវុធ ។ រុស្ស៊ីនិងចិនបានប្រើសិទ្ធិវេតូរបស់ខ្លួនពីរដងដើម្បីរារាំងសកម្មភាពណាមួយរបស់ក្រុមប្រឹក្សាសន្តិសុខអង្គការសហប្រជាជាតិ។

បន្ទាប់ពីជួបជាមួយលោក បានគីមូន (Ban Ki-moon) អគ្គលេខាធិការអង្គការសហប្រជាជាតិនៅក្រុងញូវយ៉កលោក អាណាន់ បានប្រាប់អ្នកយកព័ត៌មានថា "ខ្ញុំនឹងស្នើទៅលោកប្រធាធិបតី អាសាដ ឱ្យលោកចូលរួម មិនត្រឹមតែជាមួយនឹងរូបខ្ញុំនោះទេ ប៉ុន្តែជាមួយដំណើរការដែលយើងកំពុងតែចាប់ផ្ដើមនេះ"។ លោកបានបន្ថែមទៀតថា "ខ្ញុំរំពឹងថា នឹងទៅដល់ប្រទេសស៊ីរីឆាប់ៗនេះក្នុងពេលវេលាដ៏សមស្របមួយ"។

លោក អាណាន់ ដែលជាអតីតអគ្គលេខាធិការអង្គការសហប្រជាជាតិពីឆ្នាំ១៩៩៧ ដល់ឆ្នាំ២០០៦នោះ បាននិយាយថា "ជាដំបូងយើងត្រូវធ្វើអ្វីដែលយើងអាចធ្វើបានដើម្បីបញ្ឈប់អំពើហិង្សា និងការសម្លាប់ព្រមទាំងសម្រួលកិច្ចការមនុស្សធម៌ ហើយធ្វើឱ្យប្រាកដថាមានការយកចិត្តទុកដាក់ចំពោះប្រជាពលរដ្ឋដែលកំពុងត្រូវការជំនួយនឹងធ្វើការជាមួយប្រជាជនស៊ីរី ដើម្បីរកដំណោះស្រាយដោយសន្តិវិធីមួយ"។

លោក អាណាន់ បានចាត់ទុកតួនាទីរបស់លោកថាជា "កាតព្វកិច្ចដ៏លំបាកបំផុតមួយ វាគឺបញ្ហាប្រឈមដ៏លំបាកមួយ" ហើយក៏បានអំពាវនាវឱ្យសហគមន៍អន្តរជាតិធ្វើការរួមគ្នាដើម្បីបញ្ឈប់ការប្រយុទ្ធគ្នានេះ។

លោក បាន គីមូន បានប្រាប់អ្នកយកព័ត៌មានកាលពីថ្ងៃពុធកន្លងទៅនេះបន្ទាប់ពីជួបជាមួយលោក អាណាន់ ថា "ខ្ញុំទទូចយ៉ាងខ្លាំងសុំឱ្យអាជ្ញាធរស៊ីរីបង្កើតកិច្ចប្រតិបត្តិការពេញលេញរបស់ខ្លួន" ។ លោកបានបន្ថែមទៀតថា "ខ្ញុំសូមអំពាវនាវម្ដងទៀតឱ្យអាជ្ញាធរស៊ីរីធ្វើកិច្ចការ ដើម្បីឆ្ពោះទៅរកដំណោះស្រាយតាមបែបប្រជាធិបតេយ្យ និងដោយសន្តិវិធីសម្រាប់ប្រជាពលរដ្ឋ ស៊ីរី" ៕

*ប្រែសម្រួលដោយ អូន ភា*

នាទី ព្រះពុទ្ធសាសនា

# ពុទ្ធប្បវត្តិអមដោយរូបភាព

- ❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- ❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
- ❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- ❖ បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

**១៨២-** ទោះបីជាយ៉ាងណាក៏ដោយ. ទេវទត្តមិនយកចិត្តទុកដាក់គោរពតាមទូន្មានរបស់ព្រះអង្គឡើយ រួចហើយក៏ក្រោកចេញទៅទាំងចិត្តមួម៉ៅពុះកញ្ជ្រោយបំផុត ។ មិនយូរប៉ុន្មាន ទេវទត្តក៏ដឹកនាំបានភិក្ខុមួយចំនួន ដែលស្រឡាញ់ជឿជាក់លើខ្លួន ហើយបង្កើតបានជាគណសង្ឃថ្មីមួយនៅក្នុងប្រទេសនេះ ដែលមានខ្លួនលោកជាប្រធាន ហើយគោរពតាមច្បាប់វិន័យថ្មីរបស់ខ្លួនយ៉ាងតឹងរឹង ។ ដោយទ្រង់ជ្រាប់រឿងនេះសព្វគ្រប់. ព្រះដ៏មានជោគ ទ្រង់ត្រាស់ប្រើព្រះសារីបុត្រទៅសំដែង ធមិពន្យល់ភិក្ខុទាំងនោះ ឱ្យដកខ្លួនចេញពីស្ថានការណ៍អកុសលនេះ ។ ព្រះសារីបុត្រនិមន្តទៅដល់ ចំពេលដែលទេវទត្តកំពុងសឹងសំរាកពេលថ្ងៃ ។ ពេលនោះ ព្រះសារីបុត្រមានថេរដីការ ប្រាប់ចំៗអំពីព្រះពុទ្ធតិរះគិតឃើញពីការបង្កើតឱ្យមានគណសង្ឃថ្មីនោះយ៉ាងណា. ហើយថែមទាំងបានបង្ហាញភិក្ខុទាំងអស់ឱ្យឃើញពីអំពើ និងអាកប្បកិរិយាជាច្រើនទៀតរបស់ទេវទត្ត។ ដំណឹងថ្មីព្រមទាំងការយល់ដឹងឃើញច្បាស់នេះបានធ្វើឱ្យភិក្ខុទាំងអស់ផ្លាស់ប្ដូរចិត្តគំនិត ហើយព្រមវិលត្រឡប់មកជាមួយព្រះសារីបុត្រមកនៅជាមួយព្រះពុទ្ធបរមគ្រូវិញ ។

**១៨៣-** នៅពេលទេវទត្តភ្ញាក់ឡើង លោកដឹងថា គ្រប់ទីកន្លែងនៅតែមានភាពមិនធម្មតាដដែល ។ លោកចេញមកមើលខាងក្រៅ ក៏ស្រាប់តែមិនឃើញមានភិក្ខុនៅសល់សូម្បីមួយអង្គឡើយ ។ បន្តិក្រោយមក មានជនមួយចំនួនប្រាប់ថា ព្រះសារីបុត្រនិមន្តមកនិយាយបញ្ចុះបញ្ចូលភិក្ខុទាំងឡាយ ហើយក៏នាំភិក្ខុទាំងអស់ត្រឡប់មករកព្រះពុទ្ធវិញអស់ ។ ទេវទត្តពុជូថ្មោះ ខឹងច្រឡោតយ៉ាងខ្លាំង តែដោយកំលាំងចុះខ្សោយ លោកមិនអាចធ្វើដំណើរបានឆ្ងាយ ក៏បញ្ជាឱ្យអ្នកបំរើរៀបចំគ្រែស្នែងសែងលោកទៅជួបនឹងព្រះពុទ្ធដើម្បីដោះស្រាយនាំយកភិក្ខុទាំងឡាយមកនៅជាមួយវិញ ។

**១៨៤-** កាលដែលភិក្ខុទាំងឡាយដឹងថា ទេវទត្តនិមន្តមកទាំងប្រកបដោយកំហឹងពុះពារផង. ភិក្ខុទាំងឡាយ បានពិគ្រោះយោបល់គ្នា សុំឱ្យព្រះពុទ្ធជាម្ចាស់ទ្រង់លាក់ព្រះអង្គសិន ព្រោះគេមានការភ័យខ្លាចទេវទត្តកំណាចអាចធ្វើឱ្យព្រះអង្គគ្រោះថ្នាក់ ។ តែព្រះដ៏មានជោគនៃយើងទ្រង់មិនមានការភ័យខ្លាចដល់តិចឡើយ ។ ព្រះអង្គទ្រង់ត្រាស់ទៅកាន់ព្រះសារីបុត្រថា: "ភិក្ខុទេវទត្តមិនអាចធ្វើឱ្យតថាគតដល់នូវសេចក្ដីអន្តរាយបានទេ" ។ មហាជនទាំងឡាយដឹងថា អ្វីដែលព្រះអង្គមានដីកាហើយ គឺសុទ្ធតែជាការពិតទាំងអស់ ។ បន្តិចក្រោយមក ភិក្ខុទាំងឡាយមានគេប្រាប់ថា ទេវទត្តដល់នូវមរណៈភាពដែលមិនគួរឱ្យជឿ នៅខណៈដែលមានស្នែងឈប់សំរាកតាមផ្លូវ ។ ចាប់តាំងពីពេលនោះមករហូតដល់ព្រះពុទ្ធបរិនិព្វានទៅ គណសង្ឃទាំងទូលគង់នៅជាសុខសប្បាយឥតមានអ្នកបំបែកបំបាក់ទៀតឡើយ ។

**១៨៥-** ព្រះបរមគ្រូជាម្ចាស់នៃយើង ទ្រង់បានប្រោសសត្វលោកអស់៤៥ព្រះវស្សា ។ ព្រះអង្គទ្រង់យាងទៅមកគ្រប់ព្រះរាជាណាចក្រតូចធំជិតខាងទាំងអស់ក្នុងប្រទេសឥណ្ឌា. ទ្រង់និមន្តដោយព្រះបាទផ្ទាល់មិនដែលមានយានជំនិះអ្វីឡើយ ។ រៀងរាល់រដូវវស្សា ព្រះអង្គទ្រង់គង់ចាំព្រះវស្សាក្នុងអារាមនានា ដែលទាយក-ទាយិកាទាំងឡាយថ្វាយប្រគេនព្រះអង្គ ។ កន្លែងដែលព្រះពុទ្ធអង្គគង់នៅញឹកញាប់ជាងគេបំផុតគឺ វត្តវេឡុវ័ន ក្បែរក្រុងរាជគ្រឹះដែលព្រះបាទពិម្ពិសារសាងថ្វាយ និងវត្តជេតពន ក្បែរក្រុងសាវត្ថីជាអារាមរបស់អនាថបិណ្ឌិកសេដ្ឋីសាងថ្វាយព្រះអង្គ ។ ក្នុងកំឡុងពេលទាំង៤៥ព្រះវស្សា ព្រះពុទ្ធជាម្ចាស់នៃយើងទ្រង់តែងបំពេញពុទ្ធកិច្ចដ៏ខ្លាំងក្លាជារៀងរាល់ថ្ងៃ ក្នុងការបង្រៀនអមិ និងផ្សព្វផ្សាយព្រះធមិ ។

(នៅមានតលេខក្រោយ)

- ❖ Original Illuatration and Naration in Thai by Gunapayuta.
- ❖ Translation into English by A Lu.
- ❖ Coloring by Yann Fang Lee
- ❖ Translation into Khmer by Bhikkhu Kong Am.

**182-** Devadatta. however. paid no attention to the Buddha's warnind and left feeling very spiteful, Soon he led away a group of bhikkhus who trusted him and formed a new Sangha with himself as their leade. and strictly observed his new code of living. Being a ware of all this. the Buddha sent Sariputra to advise this group of bhiksus to get themselves out of this unfotunate situation. Sariputra arrived just as Devadatta was taking his nap. He then related honestly what the Buddha's opinion was regarding the formation of the new Sangha and also the pointed out to them may facts about Devadatta's character and actions, This new information and insight changed the minds of all returned bhikkhus, and they all returned with Sariputra to the Buddha.

**183-** When Devadatta woke up from his afternoon nap, he be came a ware that it all still unusually every-where. He came out to investigate and foun that there was not a single bhikkhu remaing. After a while others told him that Sariputra had come and talked to the bhikkhus and took them back to Buddha, Devadatta was extremely furious, but since he could not walk for a long way because of his body was weak, he ordered his servants to prepare a sedan-chair and to carry him to see the Buddha so that he could find out what buddha's purpose was in drawing back to himself all the bhikkhus.

**184-** When the bhiksus learned that Devadatta was approaching in a rage, they offered their opinion, requesting that the Buddha he shoud hide himself, for they feared that an irritated Devadattta might become dangerous when he saw the Buddha. But the Buddha was not in the least afraid. He said to Sariputra : " Devadatta cannot do any harm to the Buddha." Later on ; people found that what the Buddha had said was extremely true, for the bhiksus were soon informed that Devadatta had died unex-pectedly when the chair-bearers paused on the road for short rest. From that time until the buddha's nir-vana, the Sangha was never disrupted again.

**185-** The Buddha taught and converted beings for forty-five years algether, He Traveled to and from neighboring kingdoms in Indai, both large and small, always on foot never using any vehicle. During the raing seasons, he stayed at monasteries offered to him by various patrons. The place Buddha stayed at most often were Venuvana, near Rajagrha, offered to him by King Bimbisara, and Jetavana, near Sravasti, donated by Anathapindika. During these years, the Buddha worked diligently everyday to teach and to propagate the dhamma.

(Continued to after Issue)



# ស្លឹកត្រចៀកក្រាញ់ បំបាត់អាការៈជាំសាច់



●●● រឿងឧប្បត្តិហេតុបុកជល់ទង្គិចនេះរមែងកើតមកស្ទើរតែគ្រប់ទីកន្លែង ដូចជាដើរបុកនេះទង្គិចនោះជាដើម ។ ក៏ប៉ុន្តែក្នុងករណីក្រោយកើតឡើង ហើយលេចចេញនូវស្នាមជាំខ្មៅឡើងមកនោះអាចធ្វើឱ្យបាត់បង់អស់សោភ័ណភាពស្បែកជាពិសេសទៅលើសុខភាពស្ត្រី ។ ប្រសិនបើលោកអ្នកមិនចង់ឱ្យស្នាមជាំខ្មៅនេះនៅរំខានចិត្តតទៅទៀតនោះសូមសាកល្បងតាមវិធីណែនាំដូចខាងក្រោមនេះ :

**វិធីណែនាំគឺ :**

យកស្លឹកត្រចៀកក្រាញ់ទៅបុករហូតដល់ចេញទឹក រួចច្រកទឹកនេះនៅក្នុងឧបករណ៍អ្វីមួយបន្ទាប់មកយកវាទៅក្លាសហ្សេនៅក្នុងប្រឡោះសំរាប់ធ្វើទឹកកកក្នុងទូទឹកកក ។ ប្រសិនបើមុខរបួសនោះ រលាត់ឬជាំខ្មៅសាច់ណែនាំឱ្យប្រើទឹកត្រចៀកក្រាញ់ដែលក្លាសេរហូតកកទៅជាដុំទឹកកកទៅហើយនោះរេចខ្ចប់ដោយក្រណាត់ហើយប្រមៀលស្អំនៅលើបរិវេណជាំខ្មៅនោះ ។ គ្រាន់តែធ្វើតាមការពោលណែនាំមកខាងលើនេះ វាអាចជួយលុបបំបាត់ស្នាមជាំខ្មៅព្រមទាំងអាចប្រើឃាត់ឈាមបានទៀតផង ៕

# ទទួលទានដំឡូងបារាំងបំពង អាចប្រឈម និងរោគទឹកនោមផ្អែម



▸ កាលណាគេផ្តើមពោលពីដំណើរដែលមានលក្ខណៈផុយស្រួយទំពាលាន់ក្រួបៗនោះ ប្រាកដជាមានមនុស្សមិនតិចនាក់ទេដែលក្របួចមាត់ញញឹមស្វាគមន៍រាក់ទាក់ ព្រោះតែមានចំណូលចិត្តជាពិសេសចំពោះសុភាពនារី ។ ក៏ប៉ុន្តែបើតាមការពិសោធន៍ស្រាវជ្រាវគេបានរកឃើញថា អ្នកដែលចូលចិត្តទទួលទាននំចំណីប្រភេទហ្វ្រេនហ្វ្រាយច្រើន ក្រៅពីឡើងទម្ងន់ខ្លួនយ៉ាងគំហុកគួរឱ្យតក់ស្លុត ហើយនោះវាថែមទាំងប្រឈមជាមួយរោគទឹកនោមផ្អែម រហូតដល់ទៅ២១ភាគរយទៀតផង ។ ក៏ប៉ុន្តែក្នុងករណីជាប់ចិត្តដកមិនរួចនោះយើងសូមណែនាំឱ្យលោកអ្នកមកសាកល្បងនំប័ុងដែលផលិត ចេញពីម្សៅដំឡូងបារាំងវិញប្រសើរជាង ៕



# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំថោះ

ជោគជតាប្រចាំសប្តាហ៍




ការងាររត់ការភាគច្រើនទទួលបានជោគជ័យក្នុងសង្គមការងារអាចមានការដោះដូរចៅហ្វាយនាយ ។ អ្នកធំ ឬមិត្តភ័ក្តិ-ហាក់សម្តែងការសោះ អង្គើយដាក់ ។ ខែនេះមានគម្រុយត្រូវចាយវាយលុយកាក់អស់ច្រើន តែមិនដលខ្វះរត់ពីងអ្នក ដទៃនោះទេ ។ ខែនេះមិនគួរប្រថុយប្រថានដាក់ទុនរកស៊ីនោះទេ ៕




គ្រប់ការងារទាំងអស់មានផលរីកចម្រើនខ្លាំងបំផុត តែមួយរយៈនេះមិនសូវមានការអត់ធ្មត់ ។ ក្រោយពីថ្ងៃទី១៣ ទៅរឿងលុយកាក់កាន់តែរីកចម្រើនជាងមុន ។ ការទំនាក់ទំនងកាន់តែប្រសើរការលក់ដូរកើបផលកម្រៃបានច្រើនហួសពីការស្មានទុក ។ មិនតែប៉ុណ្ណោះរឿង ស្នេហាក៏បានសម្រេចតាមបំណងទៀតផង ៕




ការទំនាក់ទំនងមុខជំនួញបានល្អប្រសើរ ។ ចាប់ពីថ្ងៃទី៤ទៅអ្វីៗសព្វបែបយ៉ាងនឹងបានធូរស្រាលឡើងវិញច្រើន ដូច្នេះគួរប្រូតរះសម្រេចការងារសំខាន់ៗឲ្យរួចមុនបំណាច់ខែនេះ ។ រាល់បញ្ហាទាំងអស់ នឹងមានមនុស្សលូកដៃជួយដោយ គ្មានសំណង ។ ចាប់ពីថ្ងៃទី២១ ទៅមានចំណូល ពីការងារតែលាភផ្សងសំណាងគ្មាននោះទេ ៕




លោកអ្នកមានអារម្មណ៍ស្ពឹកស្រពន់មិនចង់ធ្វើអ្វីទាល់តែសោះ ។ ការងារជួបឧបសគ្គធ្វើឲ្យងាយមានអារម្មណ៍ធេវធារ ។ ចាប់ពីដើមខែ លោកអ្នកគ្មានអារម្មណ៍បានសុខនោះទេ ។ តែក្រោយថ្ងៃទី១៣ អារម្មណ៍នឹងបានធូរស្រាលមុខ ជំនួញការងារមានផលល្អប្រសើរឡើង ។ ក្រោយថ្ងៃទី២១ ផលចំណូលអាចស្រកស្រុតចុះ ៕




មានចិត្តរារែកក្នុងការសម្រេចចិត្តធ្វើអ្វី មួយព្រោះភាគច្រើនៗប្រឈមមុខជាមួយគូសត្រូវ ដែលស្ថានភាពបែបនេះទាមទារឲ្យមានជំនឿចិត្តលើខ្លួនឯងទើបល្អ ។ រឿងលុយកាក់ពិតជាជួបការខ្វះខាត តែការងារព្រមព្រៀងគ្នាបែរជាងាយស្រួលបំផុត ។ នៅពាក់កណ្តាលខែនេះ នឹងបានទទួលរបស់ណាមួយដែលខ្លួនប៉ុនប៉ងទុកជាយូរមកហើយទៀតផង ៕




ហាក់ដូចជាឃ្លាតឆ្ងាយពីសង្គមមិនសូវមានទំនាក់ទំនងជាមួយអ្នកដទៃ ធ្វើឲ្យការជឿជាក់លើខ្លួនឯងថយចុះ ។ ក្នុងសង្គមគ្រួសារកើតមានបញ្ហាកាំរកូសបន្តិចបន្តួច ។ តែគោងចងចាំទុកថា រាល់ការងារទំនាក់ទំនងទាំងអស់ចៀស មិនផុតពីភាពបរាជ័យ ដោយសារទប់អារម្មណ៍មិនបាន ។ រឿងស្នេហាមានផលមិនសូវល្អ ៕




មានអ្នកធំលូកដៃជួយជ្រោមជ្រែងទទួលបានជោគជ័យគួរឲ្យពេញចិត្ត ។ ក្រៅពីដំណើរការងារ ចាស់មានភាពរលូនហើយ នោះ ក៏នៅមានការងារថ្មីៗហូរចូលមកទៀតផង ។ ក្រោយថ្ងៃទី ១៦ទៅ លោកអ្នកមានទំនុកចិត្តកាន់តែល្អឡើង និង ក្រោយថ្ងៃទី២១ ទៅមានការងារថ្មីៗហូរចូលបន្ថែមទៀត ៕




ស្ថានភាពលុយកាក់មិនមានដំណើរការល្អ ចិត្តគំនិតល្អក់កករមានជម្លោះនៅក្នុងសង្គមគ្រួសារងាយបំផុត ។ ក្នុងខែនេះមានលាភបន្តិចបន្តួចតែត្រូវចាយលុយច្រើន ។ គោងប្រយ័ត្នទៅលើគំនិតភ័ន្តច្រឡំលើនរណាម្នាក់ដោយមិនសមហេតុផល ។ មិនគួរធ្វើដំណើរទៅក្បែរសំណង់មិនទាន់រួច ។ រឿងស្នេហា មានការគាំទ្រពីចាស់ទុំ ៕




ជីវិតប្រចាំថ្ងៃធ្លាក់ស្ពឹកស្រពន់គ្មានភាពស្ទុះស្ទា ទោះបីជាមានវត្ថុជំនួយបន្ទរកម្លាំង ក៏ដោយចុះ ។ ក្នុងខែនេះមានមនុស្សមកទំនាក់ទំនងច្រើនមានទាំងថ្មី និងចាស់មកចម្រុះគ្នា តែប្រសិនបើអ្នកនៅឃ្លាតឆ្ងាយពីអ្នកនោះ នឹងបានសេចក្តីសុខ ។ ក្នុងខែនេះ លាភពីការងារមិនសូវមានតែលាភផ្សងសំណាងអាចទទួលបានខ្លះៗ ។ ចំណែករឿងស្នេហាមានទុក្ខ ៕




លោកអ្នកជួបរឿងប្រែប្រួលទៅរកផ្លូវល្អច្រើនការដាក់ទុនរកស៊ីបានរីក ចម្រើនអាចដោះស្រាយបញ្ហាធំៗបានសម្រេច ។ បណ្តាអ្នកធំជួយជ្រោមជ្រែងផ្តល់គំនិតល្អៗ ដែលសុទ្ធសឹងជាប្រយោជន៍ ។ តែមនុស្សដែលធ្លាប់ស្និទ្ធស្នាល ពីមុនមកចាប់ផ្តើមឃ្លាតឆ្ងាយពី លោកអ្នកដោយមិនដឹងពីមូលហេតុ ។ រឿងស្នេហាមិនសូវល្អ ៕




ភាពស្និទ្ធស្នាលរវាងបងប្អូនចាប់ឃ្លាតឃ្លាលជាបណ្តោះអាសន្ន ។ បញ្ហាសុខភាពជារួមមិនសូវល្អ បើមានជំងឺធាប់ព្យាបាល ក៏ប៉ុន្តែបានល្អប្រសើររឿងកេរ្តិ៍ឈ្មោះកិត្តិយស ។ ការងារចរចាភាគច្រើនទទួលបានជោគជ័យនៅក្នុងភាគហ៊ុនមានភាពចុះសម្រុងគ្នាល្អ ។ ការងារជារួមទទួលបានផលល្អគ្រប់បែបយ៉ាងតែបើមានមនុស្សពឹងពាក់លុយកាក់គួរបដិសេធ ៕




ជោគជតារាសីកំពុងស្រុតចុះបន្តបន្ទាប់ធ្វើឲ្យរឿងលុយកាក់ជួបនឹងបញ្ហាស្មុគស្មាញ ។ ទោះបីជាបែបនេះក្តី ក៏នៅមានរឿងល្អខ្លះៗហូរចូលផងដែរ ។ ការងារទំនាក់ទំនងអាចទុកជាបណ្តោះអាសន្ន ។ ប្រសិនបើមានរឿងសំខាន់ណាមួយត្រូវសម្រេចនោះ គោងពិចារណាឲ្យម៉ត់ចត់បន្តិច ។ ចុងខែកាន់តែជួបផលលំបាកទ្វេដង ៕















## ដំណឹងរកអ្នកធ្វើការ

ហាងធ្វើក្រចកកំរិតខ្ពស់ នៅតំបន់ធូបា នៃរដ្ឋញូជឺរស៊ី
ត្រូវការអ្នកធ្វើការមានបទពិសោធន៍ក្នុងបច្ចេកទេសធ្វើក្រចក
អ្នកដាក់ពាក្យដែលមានអាជ្ញាប័ននៅញូជឺរស៊ី និងត្រូវទទួលពិនិត្យមុនគេ

- ត្រូវការឱ្យចេះភាសាអង់គ្លេស
- មានចំណេះខាងទំនាក់ទំនងល្អជាមួយភ្ញៀវ
- បៀវត្សសមរម្យ-ធីបបានច្រើន
- ភ្ញៀវភាគច្រើនរបស់យើង ច្រើនជាភ្ញៀវស្បែកស
- សូមហៅរកដើម្បីដាក់ពាក្យ: អាឡិច 267 269 7789

***កំណត់ : យើងមានលក់ហាងធ្វើក្រចកមួយចំនួននៅកន្លែងល្អ ហើយតុបតែងក្នុងហាងកំរិតខ្ពស់***

## EMPLOYMENT OPPORTUNITY

UPSCALE NAIL SALON IN DEPFORT, NJ NOW HIRING EXPERIENCED NAIL TECHNICIANS APPLICANTS PERTAIN NJ LIENCESE WILL BE FIRST CONSIDERED

- MUST SPEAK ENGLISH
- GOOD INTERPERSONAL COMMUNICATION
- COMPETITIVE SALARY
- GREAT TIPS

TO APPLY PLEASE CONTACT: ALEX 267-269-7789

***NOTE : We are now selling many nail businesses, great location, and high-end interier design.***

## ភោជនីយដ្ឋាន ណាម វាង ( ភ្នំពេញ )

## *Nam Vang Restaurant*

**571 Unit#1 Adams Svenue. Philadelphia, PA 19120**
(inside Hong Kong Market) **(215) 742-9488**



ប្រចាំរាល់ថ្ងៃលោកអ្នកអាចពិសាទឹកក្រឡុក
គ្រប់រសជាតិផ្លែឈើ ដូចជា:
ទុរេន ឬ អាវុកាដូ ហើយជាពិសេស
មានទឹកអំពៅស្រស់ៗ

**១_មុខជំនាញខាងម្ហូបខ្មែរ យ៉ាងចំណាន ដូចជា :**

-គុយទាវភ្នំពេញ
-គុយទាវ ឬមី-ខគោ
-មីកន្ទាំង ឆារសាច់គោ
-មីកន្ទាំងឆារគ្រឿងសមុទ្រ
-បាយឆារគ្រប់មុខ
-សាច់គោអាំង ចង្កាក់ ជាមួយជ្រក់ល្ហុង

**២_មុខជំនាញម្ហូបវៀតណាម ល្ហុយឆ្ងាញ់ ដូចជា :**

-នំបញ្ចុកទឹកត្រីពិសេស
-នំប៉័ងបាតេ ឬសាច់គោអាំង
-ខគោ នំប៉័ង ឬ មី និងគុយទាវ
-បាយសរសាច់ជ្រូកអាំង ឬសាច់មាន់អាំង

**Open 7 days a week from 9a.m-9p.m**
**បើក 7 ថ្ងៃក្នុងមួយអាទិត្យពីម៉ោង ៩ ព្រឹក ដល់ ៩ ល្ងាច**

## ANGKOR AUTO SERVICE,INC.

## ហាងជួសជុលរថយន្ត “អង្គរ”

**Free Estimate**

**Auto Body and Maintenance**

BODY WORKS
Auto glass and windshields
Auto Frame Straightening and Painting

មានបទពិសោធន៍២០ឆ្នាំ ជាជាងរថយន្តមានសញ្ញាប័ត្រវាយតម្លៃការងារដោយឥតយកថ្លៃ ហើយយើងជួយសន្សំប្រាក់តម្លៃបន្ថយរបស់អិនស៊ូរិនបានផង យើងផ្តល់សេវាគ្រប់យ៉ាង :

ENGINE AND TRANSIMISSION SERVICES
State Inspection
Check Engine Light Diagnostic
Timing Belt Services
Complete Tune Up:
-Brake -Muffler -Struts
-Water Pump -A/C
-Bearing Services



From the moment you get into car accident, we will take care of you from towing to calling your insurance, and to get a rental car for you. With Angkor Auto, you can be worried free.

4835 N. 16th Street. Philadelphia, PA 19141
Tel : (215) 455-7810 / Ricky : (215) 485-1425

## ហាងខ្មែរជួសជុលរថយន្ត

**បើចង់ឱ្យរថយន្តលោកអ្នករត់បានល្អ សូមអញ្ជើញ**

## Rathe´s Auto Service

State and Emission Inspaction General Repairs and Maintenance

MON-SAT, 8:30AM-5:30PM
SUN. EMERGENCY ONLY




- ជាងមានបទពិសោធន៍ជាយូរឆ្នាំ -ជួសជុលរថយន្តគ្រប់ប្រភេទ
- មានដូរប្រេង ដូរហ្វ្រាំង ដូរកង់ និងករណីជាច្រើនទៀត ។
- មានត្រួតពិនិត្យគ្រឿងម៉ាស៊ីន DIAGNOSTICS ដោយឥតគិតថ្លៃ
- មានចុះថ្លៃពិសេស ចាប់ពីខែកុម្ភៈ ២០០៨ ទៅ : - ដូរប្រេងកំរិត ៥ ក្វាត $22
- INSPECTIONS រថយន្តឆ្នាំ 96 up $49.99+ តាក់ -មានជូនប័ណ្ណពិសេសសំរាប់ដូរប្រេងចុះថ្លៃពាក់កណ្តាល នៅពេលយកមកជួសជុលអស់តម្លៃ $150.
- តម្លៃជួសជុលទូទៅ សមរម្យ ដោយទាបជាងហាងជួសជុលផ្សេងៗទៀត ។
- ប្តេជាចិត្តធ្វើជូនដោយហ្មត់ចត់ គុណភាពខ្ពស់ មិនឱ្យខុសបំណងលោកអ្នកឡើយ។ ពិសេស ជួយទៅពិនិត្យដល់កន្លែងនូវរថយន្តណាដែលខូច STARTER ឬ ធុងអាគុយអស់ភ្លើងដោយឥតគិតថ្លៃ ។ *សូមអរគុណ !*

5105 N.2ND ST., PHILADELPHIA, PA 19120. TEL : (215) 329-2418
Fax : (215) 329-2419. Rath CELL : (215) 431-6376

# ឱសថស្ថាន TRX PHARMACY

**5520 Whitaker Avenue Unit C (Next To BEN CITY)**
**PHILADELPHIA, PA 19124 TELEPHONE: 215-288-8701**

## ម្ចាស់ហាង: ស៊ីវ អេង

- យើងទទួលយកអ៊ិនស្វ៊ិនស្ទើរតែទាំងអស់
- អាចយកថ្នាំទៅជូនដល់ផ្ទះ
- មានគម្រោងបង់ថ្លៃពិសេស សម្រាប់ "ខូប៉េយ" ដែលមានតម្លៃខ្ពស់
- ពិសេស: មានជូនកំរៃ៤៥សម្រាប់អ្នកមកទិញថ្មីដែលមានការផ្ទេរវេជ្ជបញ្ជា
- កន្លែងចតឡានធំទូលាយ
- សេវាត្រឹមត្រូវច្បាស់លាស់ មានវិជ្ជាជីវៈធ្វើការលឿន
- មានវង្វាន់ បើយកវេជ្ជបញ្ជាមកទិញថ្នាំ

**ពិសេស**: ជូនម្សៅអិនស៊ូមួយកំប៉ុងពេលទិញតាមវេជ្ជបញ្ជា១០មុខ មានសំរាប់ភ្ញៀវដែលគ្មាន អិនស្វ៊ិន មានថ្នាំជេណេរិត ច្រើនរយមុខតម្លៃ $14.99 សំរាប់៩០ថ្ងៃ ថ្នាំអនតាយបាយូទិក ដូចជា Amoxicillin, Ampicillin, Cephalesin តម្លៃ $4



រាល់ខែមានចាប់ឆ្នោតសម្រាប់អ្នកយកថ្នាំនៅទីនេះ អាចត្រូវឆ្នោតវត្ថុ ដូចជា Telephone

**Samsung Galaxy**
**ឬ Ipod Touch**





## តាំទ្រគ្រូពេទ្យប្រចាំគ្រួសាររមាន:

TRUONG NGUYEN, MD
5746 Rising Sun Avenue
Philadelphia, PA 19120
**215-904-6891**

KENNETH NGUYEN, MD
448 E WYOMING AVE
Philadelphia, PA 19120
**215-324-2180**

NICHOLAS TRUONG, MD
133 EAST LEHIGH AVE
Philadelphia, PA 19125
**215-426-9344**

# ហាងមាសខ្មែរអង្គរ



# Khmer-Angkor 金美成珠寶行 Jewelry

Since 1983
Certified Diamonds & Diamond Jewelry



18K & 24K Gold, Platinum Jewelry & Watches
GIA Graduate Gemologist on Staff
Authorized RADO & LONGINES Dealer
Repairs Done on Premises



600 Washington Avenue. Unit 12B.
Philadelphia, PA 19147
Tel. 215-599-2222
Fax. 215-599-2223

Open
Tuesday-Sunday
10:30AM-6:30PM
Closed Monday

Photo by Kay Lim Photography




# ហួ ឌួង ពេទ្យធ្មេញសម្រាប់គ្រួសារ

**466 Merrimack Street. Lowell, MA 01854**
**( Near City Hall ) / 978-441-1005**

**HOA DUONG, D.M.D., P.C.**

**GENERAL DENTISTRY**

គ្រូពេទ្យជំនាញនិងមានបទពិសោធន៍
ច្រើនឆ្នាំក្នុងការពិនិត្យ
ថែរក្សា និងព្យាបាលជម្ងឺធ្មេញទូទៅ





Open: Monday, Tuesday, Wednesday, and Friday
from 10 a.m. – 6 p.m.
Saturday: from 10 a.m. – 4 p.m.
Closed: Thursday & Sunday
We accept all dental insurance & Medicaid

យើងទទួលយកគ្រប់ក្រុមហ៊ុនធានារ៉ាប់រង
សុខភាព និងការធានារ៉ាប់រងសុខភាពមនុស្សចាស់

**យើងបើកទ្វារទទួលភ្ញៀវ ៥ថ្ងៃ ក្នុងមួយសប្តាហ៍**
**បិទទ្វារ : ថ្ងៃព្រហស្បត្តិ៍ និងថ្ងៃ អាទិត្យ**

**ទូរស័ព្ទដើម្បីណាត់ជួប (978) 441-1005**
**ម៉ោងធ្វើការពីម៉ោង 10ព្រឹក ដល់ 6ល្ងាច**
**ថ្ងៃសៅរ៍ ពីម៉ោង 10ព្រឹក ដល់ 4រសៀល**
**យើងមានបុគ្គលិកនិយាយភាសាខ្មែរ**

# 978-441-1005

300+ Cars a week



# បើកកម្មវិធីដេញថ្លៃឡានជាសាធារណៈ:

INTERSTATE
Auto Auction

Auctioncar.net
(603) 893-7777

## In Salem, NH-Just 20 Minutes from Lowell MA

**OPEN TO THE PUBLIC LIVE CAR AUCTION Saturdays 10:30AM**

***Test Starts/Preview! Starts at 9AM***

## Wednesdays 5:30PM

***Free Test Drives Before You Buy!***

**Starts Wednesday at 9AM-5PM**

Only 40 Minutes From Lynn and Revere, MA
Just Over 1 Hour from Providence, RI
Or You Can Even Bid Online From Philadelphia, PA or New Jersey and Have The Car Delivered to Your Home"

**www.interstateautoauction.com**

**NH Lic#Auctioneer Alan Chambers/20 Hampshire Road - Salem NH 03079**



2003 Hummer H2, DVDs Navigation
KELLY BLUE BOOK VALUE:
$21,250 Estimated Final Bid $17.500




2004 Cadillac, DVD Navigation 4x4
$7.500




2004 Nissan Pathfinder Armada
Estimated Final Bid $8,900



2005 Honda Civic, Only 59,000 Miles!
KELLY BLUE BOOK VALUE: $13,210
Estimated Final Bid $11,000



2005 Mercedes-Benz
M-Class, Only 71,000 Miles
KELLY BLUE BOOK VALUE: $17,625
AUCTION PRICE Less $14,000




2008 Toyota Yaris, 50,000 miles
$7,900 Estimated Final Bid

-ឥតមានកក់លុយ សម្រាប់ដេញថ្លៃនៅក្នុង Online ឬទៅកន្លែងទេ -មានឡាន៣០០ ក្នុងមួយសប្តាហ៍
-Interstate Auto Auction, Salem NH ដែលនៅចម្ងាយ២០នាទីពីក្រុងឡូវែល អ្នកណាក៏អាចចូលរួមបានដែរ !
-នៅថ្ងៃសៅរ៍ ម៉ោង១០:០០ព្រឹក លោកអ្នកអាចបញ្ឆេះឡាន/ការសម្តែងឡានមុនម៉ោង៩ព្រឹក
-ថ្ងៃពុធនៅវេលាម៉ោង៥:៣០នាទីល្ងាច : លោកអ្នកអាចបើកឡានសាកល្បងពីរម៉ោង៩ព្រឹកដល់ម៉ោង៥ល្ងាច